បងប្អូនស្រី
ជាទីគោរព
រាប់អាន!

# តើធ្វើដូចម្តេច ដើម្បីអោយប្តី មានសុភមង្គល ?

# كيف تسعدين زوجك ؟

និពន្ធដោយៈ

**អាលីអះម៉ាត់ អាប់ឌល់អាលីអើតតោះតវី**

បោះពុម្ពលើកទី១ ឆ្នាំ ២០១៤

# បងប្អូនស្រីជាទីគោរពរាប់អាន

# តើធ្វើដូចម្តេចដើម្បីអោយប្តី មានសុភមង្គល ?

# كيف تسعدين زوجك؟

និពន្ធដោយៈ

**អាលីអះម៉ាត់   អាប់ឌល់អាលីអើតតោះតាវី**



# ក្នុងព្រះនាមអល់ឡោះមហាមេត្តា មហាករុណា

## សេចក្តីផ្តើម

ពិតប្រាកដ សេចក្តីសរសើរទាំងឡាយសម្រាប់អល់ឡោះ សូមសរសើរចំពោះទ្រង់ សូមបួងសួងសុំជំនួយពីទ្រង់។ សូមអភ័យទោសពីទ្រង់ សូមឱ្យទ្រង់ជួយគាំពារពីសេចក្តីអាក្រក់ទាំងឡាយរបស់ខ្លួនពួកយើង និងសេចក្តីអាក្រក់នៃទង្វើរបស់យើង។ អ្នកដែលអល់ឡោះបានចង្អុលបង្ហាញផ្លូវ អ្នកនោះនឹងមិនវង្វេងជាដាច់ខាត។ រីឯអ្នកដែលទ្រង់ធ្វើឱ្យគេវង្វេងគឺគ្មានអ្នកណាចង្អុលបង្ហាញផ្លូវដល់គេជាដាច់ខាត។ សូមសច្ចាថា គ្មានម្ចាស់ណាដែលត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដលើកលែងតែអល់ឡោះ ទ្រង់គ្មានដៃគូ ហើយសូមសច្ចាថា មូហាំម៉ាត់ជាខ្ញុំបម្រើអល់ឡោះនិងជាអ្នកនាំសាររបស់ទ្រង់។

﴿ يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ ٱتَّقُواْ ٱللَّهَ حَقَّ تُقَاتِهِۦ وَلَا تَمُوتُنَّ إِلَّا وَأَنتُم مُّسۡلِمُونَ ١٠٢ ﴾ آل عمران: ١٠٢

មានន័យថា៖ «ពួកអ្នកដែលមានជំនឿទាំងឡាយ ចូរគោរពកោតខ្លាចចំពោះអល់ឡោះដោយពិតប្រាកដ ហើយប្រកាន់ខ្ជាប់នឹងសាសនាឥស្លាមរហូតដល់ជីវិតចុងក្រោយរបស់អ្នក»។

﴿ يَٰٓأَيُّهَا ٱلنَّاسُ ٱتَّقُواْ رَبَّكُمُ ٱلَّذِي خَلَقَكُم مِّن نَّفۡسٖ وَٰحِدَةٖ وَخَلَقَ مِنۡهَا زَوۡجَهَا وَبَثَّ مِنۡهُمَا رِجَالٗا كَثِيرٗا وَنِسَآءٗۚ وَٱتَّقُواْ ٱللَّهَ ٱلَّذِي تَسَآءَلُونَ بِهِۦ وَٱلۡأَرۡحَامَۚ إِنَّ ٱللَّهَ كَانَ عَلَيۡكُمۡ رَقِيبٗا ١ ﴾ النساء: ١

មានន័យថា៖ «ឱពួកអ្នកដែលមានជំនឿទាំងឡាយ ចូរគោរពកោតខ្លាចចំពោះព្រះជាម្ចាស់របស់ពួកអ្នកដែលបានបង្កើតពួកអ្នកពីជីវិតតែមួយ(អាដាំ) ហើយទ្រង់បានបង្កើតពីជីវិតនោះនូវដៃគូរបស់គេ(ហាវ៉ា)។ ទ្រង់បានបង្កើតឱ្យមានកូនចៅប្រុសស្រីសុសសាយចេញពីប្ដីប្រពន្ធទាំងពីរនាក់នោះ។

ចូរគោរពកោតខ្លាចចំពោះអល់ឡោះជាម្ចាស់ដែលពួកអ្នកនាំគ្នាបួងសួងសុំពីទ្រង់ ហើយចូរកុំកាត់កាលសាច់ញាតិឱ្យសោះ។ ពិតណាស់អល់ឡោះជាម្ចាស់ទ្រង់ជាអ្នកឃ្លាំមើលពួកអ្នកទាំងអស់គ្នា»។

﴿ يَا أَيُّهَا الَّذِينَ آمَنُوا اتَّقُوا اللَّهَ وَقُولُوا قَوْلًا سَدِيدًا ﴿٧٠﴾ يُصْلِحْ لَكُمْ أَعْمَالَكُمْ وَيَغْفِرْ لَكُمْ ذُنُوبَكُمْ ۗ وَمَن يُطِعِ اللَّهَ وَرَسُولَهُ فَقَدْ فَازَ فَوْزًا عَظِيمًا ﴿٧١﴾ ﴾ الأحزاب: ٧٠ – ٧١

មានន័យថា៖ «ឱពួកអ្នកដែលមានជំនឿទាំងឡាយ ចូរគោរពកោតខ្លាចចំពោះអល់ឡោះ ហើយចូរពោលនូវពាក្យសច្ចៈត្រឹមត្រូវ។ ទ្រង់នឹងកែតម្រូវសម្រាប់ពួកអ្នកនូវការប្រតិបត្តិរបស់ពួកអ្នក ហើយទ្រង់នឹងលើកលែងសម្រាប់ពួកអ្នកនូវទោសកំហុសរបស់ពួកអ្នក។ អ្នកដែលគោរពប្រណិប័តន៍ចំពោះអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់នោះ ពិតជាបានទទួលជោគជ័យយ៉ាងឧត្តុង្គឧត្តមជាទីបំផុត»។

អល់ឡោះបានដាក់ច្បាប់ឱ្យមនុស្សរៀបអាពាហ៍ពិពាហ៍ ដោយមានមូលហេតុយ៉ាងសំខាន់ មានគុណប្រយោជន៍ធំ

ផងសម្រាប់បុគ្គលនិងសង្គម។ ឧទាហរណ៍ដូចជា៖

១. ការពារនិងថែរក្សាពូជអំបូរ។

២. បង្កើនចំនួនប្រជាជាតិរបស់ណាពីមូហាំម៉ាត់។

៣. រក្សាការពារផ្លូវភេទ ភ្នែក និងបំពេញចំណង់តណ្ហាតាមអ្វីដែលអល់ឡោះបានអនុញ្ញាត។

៤. រក្សាការបន្តពូជរបស់មនុស្សដើម្បីកសាងផែនដីដោយការគោរពបូជាចំពោះអល់ឡោះ។

៥. មានភាពស្កប់ស្កល់ខាងផ្លូវចិត្ត

៦. បង្ការសង្គមមនុស្សពីបញ្ហាស្រុតចុះនៃសីលធម៌សង្គមនិងជំងឺផ្លូវភេទ។

៧. អនុវត្តតាមបទបញ្ជារបស់អល់ឡោះ។

ដូចអល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា៖

﴿ فَانكِحُواْ مَا طَابَ لَكُم مِّنَ ٱلنِّسَآءِ ﴾ النساء: ٣

មានន័យថា៖« ចូរពួកអ្នករៀបអាពាហ៍ពិពាហ៍ជាមួយនឹងស្ត្រីដែលពួកអ្នកស្រលាញ់ពេញចិត្ត»។

ក៏ប៉ុន្តែពីសម័យកាលមួយទៅសម័យកាលមួយ និងទំនាក់

ទំនងពីប្រទេសមួយទៅប្រទេសមួយធ្វើឱ្យអ្នកឥស្លាមមួយចំនួនបានទទួលឥទ្ធិពលពីមនោគមន៍អាក្រក់និងរឿងភាពយន្តអាសអភាសអសីលធម៌ នាំឱ្យវិនាសមហន្តរាយដល់សង្គម។

បាតុភូតនៃបញ្ហាវិបត្តិក្នុងគ្រួសារបានចាប់ផ្តើមរីកសុសសាយរហូតដល់ច្រើនជាង៧០%នៃករណីបណ្តឹងទៅតុលាការគឺបញ្ហាអំពើហិង្សាក្នុងគ្រួសារ។

ដូច្នេះ ប្រិយមិត្តអ្នកអានជាទីស្រលាញ់ ខ្ញុំសូមផ្តល់ជូនដល់អ្នកនូវកូនសៀវភៅមួយច្បាប់ដែលមានចំណងជើងថា (បងប្អូនស្រ្តីជាទីគោរពរាប់អាន តើធ្វើដូចម្តេចដើម្បីឱ្យប្តីមានសុភមង្គល?)។

មូលហេតុដែលនាំឱ្យខ្ញុំសរសេរអំពីប្រធានបទនេះគឺ មានច្រើនយ៉ាងដូចតទៅ៖

១. អ្នកមូស្លីមបានទទួលឥទ្ធិពលពីលោកខាងលិចមនោគមន៍អាក្រក់ និងរឿងភាពយន្តអាសអាភាសអសីលធម៌ដែលនាំចូលមកក្នុងសង្គមឥស្លាមរបស់យើង។

២. សម្ប្បរការលែងលះនិងការបែកបាក់គ្នានៅក្នុងសង្គមរបស់យើង។

៣. សម្ប្បរអំពើហិង្សាក្នុងគ្រួសារ។

៤. ភាពរឹងរូសរបស់ស្ត្រីឥស្លាម និងការធ្វើខ្លួនឱ្យដូចស្ត្រីលោកខាងលិចដែលគ្មានជំនឿ។

៥. ស្ត្រីជ្រាតជ្រែកកិច្ចការរបស់មនុស្សប្រុស ហើយបុរសខ្លះបោះបង់ភាពជាអ្នកទទួលខុសត្រូវចំពោះមនុស្សស្រី។

អ្នកទាំងអស់គ្នាចាំបាច់ត្រូវដឹងថា៨០%នៃវិបត្តិគ្រួសារបណ្តាលមកពីមនុស្សស្រី។ ខ្ញុំបានប្រមូលចងក្រងមូលហេតុទាំងឡាយក្នុងកូនសៀវភៅដ៏តូចនេះ។ ខ្ញុំសង្ឃឹមថាអល់ឡោះមេត្តាប្រទានសារប្រយោជន៍ដល់ជនទាំងពីរភេទ។ ខ្ញុំក៏មិនភ្លេចរំលឹកផងដែរថា ចំពោះស្ត្រីដែលមានបញ្ញា និងគំនិតឈ្លាសវៃ ត្រឹមត្រូវ គឺគេអាចប្រើវិធីសាស្ត្រធ្វើដូចម្តេចដើម្បីបំពេញចិត្តប្តី និងឆក់យកសេចក្តីស្រលាញ់ពីប្តីរបស់ខ្លួន ដោយកិរិយាមារយាទ ការស្តាប់បង្គាប់ប្តី ការប្រើមនោសញ្ចេតនាទន់ភ្លន់ និងការតុបតែងខ្លួនប្រាណសម្រាប់ប្តីគ្រប់ពេលវេលា។

អ្នកនាំសារលោកបានមានប្រសាសន៍ទៅកាន់ស្ត្រីម្នាក់ជាប្រពន្ធរបស់សហាហ្ពាត់គាត់ថា៖

قال صلى الله عليه وسلم لإحدى نساء الصحابة رضي الله عنهم ( أذات بعل أنت ؟ ) قالت : نعم قال : ( فكيف أنت له ؟ ) قالت : ما آلوه إلا ما عجزت عنه قال : ( فانظري كيف أنت له فإنه جنتك ونارك) [صحيح الترمذي]

មានន័យថា៖ «តើនាងមានប្តីហើយឬនៅ? នាងបានឆ្លើយថា ចាសមានហើយ។ ណាពីបានសួរទៀតថា តើនាងធ្វើដូចម្តេចចំពោះគេ? ខ្ញុំបំពេញកាតព្វកិច្ចជូនគាត់លើកលែងតែអ្វីដែលខ្ញុំគ្មានលទ្ធភាពធ្វើ។ ណាពីបានមានប្រសាសន៍ទៀតថា ចូរនាងរិះរកធ្វើយ៉ាងណាបម្រើប្តីឱ្យបានល្អ។ ពិតណាស់ គេគឺជាឋានសួគ៌ និងជាឋាននរករបស់អ្នកនាង»។ (សហេះអាត់ទួរមីហ្ស៊ី)

ម្យ៉ាងវិញទៀត និយាយលាក់បាំងអី គួរឱ្យសោកស្តាយណាស់ មានបុរសខ្លះធ្វើបាបប្រពន្ធខ្លួនឯង នាងប្រៀបបីដូចជាខ្ញុំកញ្ជះដាច់ថ្លៃរស់នៅជាមួយចៅហ្វាយចិត្តសាហាវឃោរឃៅ។ យើងឃើញថាពួកគេមានជំនាញខាងធ្វើបាប ដាក់

ទារុណកម្មគ្រប់បែបយ៉ាង និងដេរប្រមាថទៅលើប្រពន្ធរបស់ខ្លួន។ ជួនកាលអាចឈានទៅដល់ការប្រើអំពើហិង្សាលើរូបរាងកាយ។ ប្ដឹងផ្ដល់ទៅដល់កម្លាំងសមត្ថកិច្ច ឬប៉ូលីសមានការពិនិត្យធ្វើកោសល្លវិច្ច័យរបស់លោកគ្រូពេទ្យ ហើយចុងក្រោយអាចឈានដល់ទៅតុលាការ ។ ណាពីគាត់បានមានប្រសាសន៍ទៀតថា៖

قال صلى الله عليه وسلم: (خَيْرُكُمْ خَيْرُكُمْ لِأَهْلِهِ وَأَنَا خَيْرُكُمْ لِأَهْلِي)

[رواه الترمذي وابن ماجه]

មានន័យថា៖ «អ្នកដែលល្អជាងគេក្នុងចំណោមពួកអ្នក គឺអ្នកដែលធ្វើល្អចំពោះក្រុមគ្រួសារច្រើនជាងគេ ហើយរូបខ្ញុំជាអ្នកដែលល្អចំពោះគ្រួសាររបស់ខ្ញុំច្រើនជាងគេ»។ រីវ៉ាយ៉ាត់អាត់ទួរមីហ្ស៊ីយ៍ និងអិបនូម៉ាហ្ជះ។

ខ្ញុំសុំពីអល់ឡោះទ្រង់មេត្តាប្រទានដល់ពួកយើងខ្ញុំនូវភាពឋិតថេរនៅលើសាសនារបស់ទ្រង់ និងទទួលបានសុភមង្គលទាំងនៅលោកីយ៍និងនៅថ្ងៃបរលោក។ បពិត្រអល់ឡោះជាម្ចាស់សូមទ្រង់មេត្តាប្រទានដល់យើងខ្ញុំ ក្រុមគ្រួសាររបស់ពួកយើងខ្ញុំ និងសាច់ញាតិរបស់ពួកយើងខ្ញុំនូវក្ដី

ស្រលាញ់ពេញចិត្ត ហើយសូមទ្រង់បង្កើតពួកយើងខ្ញុំជាអ្នកកោតខ្លាចចំពោះទ្រង់ជាម្ចាស់។

បងប្អូនស្ត្រីជាទីគោរពរាប់អាន ចូរអានដោយផ្តោតចិត្តផ្ចង់អារម្មណ៍ និងដោយការត្រិះរិះពិចារណា។ សង្ឃឹមថាយើងនឹងជួបគ្នាជាមួយនឹងការងារផ្សេងទៀត អ៊ីនសាអល់ឡោះជាម្ចាស់ សេចក្តីសរសើរនិងការប្រទានពរជ័យគឺសម្រាប់អល់ឡោះ។

**អ្នកសរសេរៈ អាលីអះម៉ាត់អាប់ឌុលអាលីអើតតោះតវី**

## ដាស់តឿនឱ្យយកចិត្តទុកដាក់ចំពោះប្តី

សាសនាឥស្លាមបានបង្កើតសិទ្ធិសម្រាប់ស្ត្រី ហើយស្ត្រីក៏មានកាតព្វកិច្ចត្រូវបំពេញផងដែរ។ កាតព្វកិច្ចដ៏ធំបំផុតរបស់ស្ត្រីគឺត្រូវគោរពសិទ្ធិប្តី។ ដែលជាឋានសួគ៌ឬជាឋាននរករបស់ស្ត្រី (បានសេចក្តីថា វាជាមូលហេតុដែលនាំឱ្យស្ត្រីចូលឋានសួគ៌ឬចុះនរក)។ មានហាទីសជាច្រើនបានដាស់តឿនឱ្យស្ត្រីយកចិត្តទុកដាក់ចំពោះការគោរពប្តី សម្រាប់ស្ត្រីណាដែលចង់ទទួលបានសុភមង្គលអមតៈទាំងនៅក្នុងលោកីយ៍ និងនៅថ្ងៃបរលោក។

អ្នកនាំសាររបស់អល់ឡោះបានមានប្រសាសន៍ថា៖

قال رسول الله صلى الله عليه وسلم:( المرأة إذا صلت خمسها وصامت شهرها وحفظت فرجها وأطاعت زوجها قيل لها ادخلي الجنة من أي أبواب الجنة شئت.) [صححه الألباني]

មានន័យថា៖ «នៅពេលណាស្ត្រីសឡាតប្រាំពេល បួសខែរ៉ម៉ាឌន ថែរក្សាកាពារភាពបរិសុទ្ធ និងគោរពប្តី គឺគេពោលទៅកាន់នាងថា ចូរចូលឋានសួគ៌តាមទ្វារណាមួយដែលអ្នកចង់»។

(ចាត់ទុកជាហាទីសសហេះដោយសៀខអាល់ហ្គានីយ៍)។ អ្នកនាំសារអល់ឡោះបានមានប្រសាសន៍ថា៖

قال رسول الله صلى الله عليه وسلم: (أيما امرأة ماتت وزوجها عنها راض دخلت الجنة). [رواه الترمذي]

មានន័យថា៖ «ស្ត្រីណាម្នាក់ដែលបានស្លាប់លាចាកលោកនេះទៅ ហើយប្តីរបស់នាងពេញចិត្តនឹងនាង គឺស្ត្រីនោះនឹងបានចូលឋានសួគ៌»។ (រីវ៉ាយ៉ាត់អាត់ទួរមីហ្ស៊ី)។ អ្នកនាំសាររបស់អល់ឡោះបានមានប្រសាសន៍ថា៖

قال رسول الله صلى الله عليه وسلم(إذا دعا الرجل امرأته إلى فراشه فلم تأته فبات غضبان عليها لعنتها الملائكة حتى تصبح) [متفق عليه]

មានន័យថា៖ «នៅពេលដែលបុរសម្នាក់ហៅប្រពន្ធរបស់ខ្លួនទៅរួមដំណេកជាមួយ តែប្រពន្ធនោះពុំព្រម ហើយបុរសនោះបានដេកខឹងប្រពន្ធ គឺទេវតា(ម៉ាឡាអ៊ីកាត់)បានដាក់បណ្តាសាស្ត្រីនោះរហូតដល់ពេលព្រឹក»។ (ហាទីសមុត្តាហ្វាគុនអាឡៃហី)។

អ្នកនាំសារបានមានប្រសាសន៍ថា៖

**قال رسول الله صلى الله عليه وسلم( لو كنت آمراً أحداً أن يسجد لأحد لأمرت المرأة أن تسجد لزوجها )** [رواه الترمذي وصححه ابن حبان ]

មានន័យថា៖ «បើសិនជាខ្ញុំប្រើមនុស្សម្នាក់ឱ្យក្រាបគោរពមនុស្សម្នាក់ទៀត គឺខ្ញុំច្បាស់ជាប្រើឱ្យប្រពន្ធក្រាបគោរពប្តី»។ ( រីវ៉ាយ៉ាត់អាត់ទួរមីហ្សីយ៍ ហើយអិបនូ ហិបហ្បានចាត់ទុកជាហាទីសហេះ)។ គេសួរទៅណាពីថា៖

**وقيل للنبي صلى الله عليه وسلم : أي النساء خير ؟ قـــــــال (( التي تسره إذا نظر ، وتطيعه إذا أمر ، ولا تخالفه في نفسها وماله بما يكره ))** [أبوداود والنسائى]

មានន័យថា៖ «តើស្ត្រីបែបណាដែលល្អជាងគេ? គាត់បានឆ្លើយថា៖ ស្ត្រីដែល ពេលប្តីមើល ប្តីសប្បាយរីករាយ។ គោរពប្តីនៅពេលប្តីប្រើ ហើយមិនដែលមានចិត្តល្មៀងធ្វើឱ្យប្តីទាស់ចិត្តទាំងខ្លួនប្រាណរបស់នាង និងទ្រព្យសម្បត្តិរបស់ប្តី»។ (អាពូដាវ៉ូត និងអាន់ណាសាអ៊ីយ៍)។

# គុណសម្បត្តិរបស់ប្រពន្ធគ្រប់លក្ខណ៍

ប្រពន្ធគ្រប់លក្ខណ៍ គឺជាសុភមង្គលនៅក្នុងលោកីយ៍។ នាងជាអ្នកជួយគាំទ្រប្តីក្នុងការប្រតិបត្តិចំពោះអល់ឡោះ ហើយផ្តល់ភាពនឹងនរ និងភាពសប្បាយរីករាយដល់ប្តីក្នុងគ្រប់កិច្ចការទាំងអស់។ ដូចណាពីបានមានប្រសាសន៍ថា៖

قال النبي صلى الله عليه وسلم : (( الدنيا متاع ، وخير متاعها المرأه الصالحة )) [رواه مسلم]

មានន័យថា៖ «លោកីយ៍គឺជាភោគទ្រព្យ ហើយភោគទ្រព្យដែលល្អជាងគេគឺស្ត្រីគ្រប់លក្ខណ៍»។ (រីវ៉ាយ៉ាត់អ៊ីម៉ាំមូស្លីម)។

ឥស្លាមបានជំរុញប្រុសៗឱ្យជ្រើសរើសប្រពន្ធគ្រប់លក្ខណ៍យល់ដឹងពីសាសនា។ ឥស្លាមបានចាត់ទុករឿងនេះជាឫសគល់ដែលគប្បីយកចិត្តទុកដាក់ បិតក្នុងប្រការដែលជំរុញឱ្យយកចិត្តទុកដាក់។ ពិតណាស់ បើសិនជាស្ត្រីនោះទន់ខ្សោយផ្នែកការប្រតិបត្តិសាសនាមិនចេះថែរក្សាការពារខ្លួន គឺនឹងអាប់ឱនដល់ប្តី បាត់បង់កិត្តិយសនាំឱ្យអសោចកេរ្តិ៍ប្តី នាំឱ្យកើតចិត្តប្រចណ្ឌប្រែទៅជាឫស្សា និងធ្វើឱ្យជីវិតរស់នៅ

របស់ប្តីមានភាពល្អក់កករ។ អ្នកនាំសារអល់ឡោះបានជំរុញយ៉ាងច្រើនអំពីការជ្រើសរើសប្រពន្ធដែលយល់ដឹងអំពីសាសនា។ ពីព្រោះស្ត្រីបែបនេះជាជំនួយដ៏សំខាន់ក្នុងការប្រតិបត្តិកិច្ចការសំខាន់ៗរបស់អ្នកមូស្លីម គឺកិច្ចការសាសនា នោះឯង។ អ្នកនាំសាររបស់អល់ឡោះបានមានប្រសាសន៍ថា៖

قال رسول الله صلى الله عليه وسلم: ( من رزقه الله امرأة صالحة فقد أعانه على شطر دينه فليتق الله في الشطر الثاني) [رواه الحاكم وصححه]

មានន័យថា៖ «អ្នកណាដែលអល់ឡោះបានប្រទានប្រពន្ធគ្រប់លក្ខណ៍ដល់គេ ពិតណាស់ទ្រង់បានប្រទានពាក់កណ្តាលសាសនាដល់គេ ចូរអ្នកនោះត្រូវកោតខ្លាចចំពោះអល់ឡោះសម្រាប់ពាក់កណ្តាល់ទៀតដែលនៅសល់»។ (រីវ៉ាយ៉ាត់ អាល់ហាគិម ហើយគាត់ចាត់ទុកជាហាទីសសហេះ)។ អំពី សាអាត់ ពិន អាពី វ៉ាកកើសបាននិយាយថាអ្នកនាំសាររបស់អល់ឡោះបានមានប្រសាសន៍ថា៖

عن سعد بن أبي وقاص رضي الله عنه عن رسول الله صلى الله عليه وسلم أنه قال: (أربعٌ من السعادة: المرأةُ الصالحة، والمسكنُ الواسع، والجارُ الصالح، والمَرْكَب الهنيء، وأربعٌ من الشقاء: المرأة السوء،

والجار السوء، والمركب السوء، والمسكن الضيِّق)

[النسائ وصححه العراقي]

មានន័យថា៖ «បួនប្រការនៃសុភមង្គលគឺ ប្រពន្ធគ្រប់លក្ខណ៍ ផ្ទះធំទូលាយ អ្នកជិតខាងល្អ យានជំនេះល្អ។ ម្យ៉ាងទៀតបួនប្រការនៃអពមង្គលគឺ អ្នកជិតខាងអាក្រក់ ប្រពន្ធខាតលក្ខណ៍ យានជំនេះមិនល្អ និងផ្ទះតូចចង្អៀត»។ (ណាសាអ៊ីយ៍ និងចាត់ទុកជាហាទីសសហេះដោយលោកអាល់អ៊ីរ៉ាគី)។

អ្នកនាំសាររបស់អល់ឡោះបានមានប្រសាសន៍ថា៖

قال صلى الله عليه وسلم : (خير نسائكم التي إذا نظر إليها زوجها سرته وإن أمرها أطاعته وإذا غاب عنها حفظته في نفسها وماله)

មានន័យថា៖ «ក្នុងចំណោមពួកអ្នក អ្នកដែលមានប្រពន្ធល្អជាងគេ គឺជាប្រពន្ធដែល ពេលប្ដីមើល ប្ដីសប្បាយរីករាយ និងស្ដាប់បង្គាប់ប្ដីពេលប្ដីប្រើ ហើយពេលប្ដីមិននៅ ចេះថែរក្សាខ្លួន និងទ្រព្យសម្បត្តិមិនក្បត់ចិត្តប្ដី»។ គាត់បានមានប្រសាសន៍ទៀតថា៖

قال النبي صلى الله عليه وسلم : (تنكح المرأة لأربع لمالها ولحسبها ولجمالها ولدينها فاظفر بذات الدين تربت يداك ) " [متفق عليه]

មានន័យថា៖ «ស្ត្រីដែលគេគប្បីយកធ្វើជាប្រពន្ធមានបួនប្រការគឺ គឺស្ត្រីដែលមានទ្រព្យសម្បត្តិ ពូជពង្ស រូបសម្ផស្ស និងសាសនារបស់នាង។ ចូរជ្រើសរើសស្ត្រីដែលមានសាសនា ចូរខឹប្រឹងឡើង!»។ (មុត្តាហ្វាគុនអាឡៃហី)។

## ទទួលរាក់ទាក់ពេលប្តីត្រឡប់មកផ្ទះវិញ

បន្ទាប់ពីបានបំពេញការងារចប់សព្វគ្រប់ បុរសម្នាក់ចេញពីធ្វើការនឿយហត់អស់កម្លាំង ព្រោះស្ទះចរាចរណ៍ដោយសារមានមនុស្សច្រើនកកកុញចេញពីធ្វើការ។ គេត្រឡប់មកផ្ទះវិញចង់នៅស្ងៀមស្ងាត់ ចង់សម្រាកក្នុងអណាចក្រផ្ទាល់ខ្លួន។ គេចេញពីធ្វើការដើម្បីចង់មកសប្បាយរីករាយជាមួយប្រពន្ធកូន។ ចូរសាកគិតលមើលថា តើប្រពន្ធគ្រប់លក្ខណ៍ដែលជាអ្នកមានជំនឿគួរគប្បីទទួលប្តីត្រឡប់មកផ្ទះវិញយ៉ាងដូចម្តេច?

មានប្រពន្ធខ្លះមិនឃើញនាងនៅផ្ទះទេ ពេលប្តីត្រឡប់មកពីធ្វើការវិញ។ ទោះដោយនាងជាប់រវល់នឹងការងារក្តី

បើសិនជានាងជាអ្នកធ្វើការ ឬនាងទៅលេងផ្ទះអ្នកជិតខាងក្តី ឬលេងផ្ទះមិត្តភ័ក្តិក្តី ឬនៅផ្ទះឪពុកម្តាយបង្កើតក្តី។ បើសិនជាប្តីត្រឡប់មកផ្ទះវិញមិនឃើញប្រពន្ធនៅផ្ទះទេនោះ នឹងបន្សល់នូវស្លាកស្នាមអវិជ្ជមានក្នុងចិត្តរបស់ប្តី។ ប្តីដែលចង់បានប្រពន្ធជាទ្រនំសម្រាប់រូបគេ ជាទ្រនំដែលមានអត្ថន័យជ្រាលជ្រៅគឺជាទ្រនំនៃសេចក្តីសុខ ភាពសប្បាយរីករាយ និងភាពស្កប់ស្កល់។ ជួនកាលប្រពន្ធនៅផ្ទះ ខណៈដែលប្តីត្រឡប់មកផ្ទះវិញ។ តែនាងមិនបានទទួលរាក់ទាក់ប្តីឱ្យមានភាពកក់ក្តៅនោះទេ បែរជាព្រងើយកន្តើយចំពោះប្តីមិនយកចិត្តទុកដាក់នឹងការមកដល់របស់ប្តី ហើយបែរជារវល់នឹងការងារផ្សេងៗទៅវិញ។ ជួនពេលខ្លះ នាងទទួលប្តីមិនព្រងើយកន្តើយនឹងប្តី តែជាការទទួលដែលអាក្រក់ជាងមិនទទួលទៅទៀត។ តើនេះជាការទទួលប្តីបែបណា? គឺការទទួលដោយការស្រែកឃំ ត្អូញត្អែរ រអ៊ូរទាំ ធ្វើឫកជាធុញទ្រាន់ និងថប់ចង្អៀត។ ធ្វើមុខក្រញូវ គំរោះគំរើយដាក់ប្តី ខឹងប្រទេញប្រទាលតោគតូង។ ការទទួលបែបនេះ ធ្វើឱ្យប្តីនឹកចង់ត្រឡប់ទៅកន្លែងធ្វើការវិញ!

តើបងប្អូនស្ត្រីមូស្លីមទាំងឡាយចង់បានដែរឬទេនូវគំរូល្អៗ របស់សហការនីនិងរបៀបនៃការទទួលរាក់ទាក់ដ៏ល្អប្រសើរ របស់ពួកគាត់ចំពោះប្តី?

## អ៊ុំមូស្ស៊ូឡៃមទទួលរាក់ទាក់អាពូតល់ហះប្តីរបស់គាត់

សហការនីដ៏ឧត្តុងឧត្តម អ៊ុំមូស្ស៊ូឡៃម កូនរបស់គាត់ជាមួយប្តីគាត់ឈ្មោះអាពូតល់ហះបានស្លាប់។ កូនគាត់ម្នាក់នេះកាលនៅរស់ឈឺច្រើន។ លុះប្តីរបស់គាត់ត្រឡប់មកដល់ផ្ទះវិញ គាត់មិនបានប្រាប់ប្តីភ្លាមៗថា កូនស្លាប់ទេ គឺគាត់បានរៀបចំចំណីអាហារឱ្យប្តីគាត់ហូប ហើយនិយាយរាក់ទាក់ថ្នាក់ថ្នមប្តីរបស់គាត់ដូចដែលប្តី និងប្រពន្ធទូទៅថ្នាក់ថ្នមគ្នា ទើបគាត់ជម្រាបប្រាប់ប្តីជាក្រោយ។

ចូរបងប្អូនស្ត្រីស្តាប់រឿងដែលមាននៅក្នុងសៀវភៅហាទីសះ អាពូតល់ហះមានកូនឈឺម្នាក់ អាពូតល់ហះបានចេញទៅក្រៅ ហើយកូនគាត់ក៏បានស្លាប់ក្នុងគ្រានោះ។ លុះដល់ពេលអាពូតល់ហះត្រឡប់មកវិញ គាត់បាននិយាយថា តើកូនខ្ញុំយ៉ាងម៉េចទៅហើយ? អ៊ុំមូស្ស៊ូឡៃមបាននិយាយថា

កូនយើងនៅដូចដើមអីចឹង អត់អីទេ។ អ្នកស្រីបានរៀបចំអាហារពេលល្ងាចឱ្យគាត់ ហើយគាត់ក៏បានទទួលទានអាហារនោះ។ បន្ទាប់មកគាត់បានរួមមេត្រីជាមួយអ្នកស្រី លុះរួចរាល់ហើយ អ្នកស្រីបាននិយាយទៅកាន់អាពូតល់ហាះថា៖ មនុស្សមួយក្រុមបានកម្ចីរបស់គេយកទៅប្រើប្រាស់ ហើយរបស់នោះនៅជាមួយគេមួយរយៈកាល។ លុះក្រោយមកម្ចាស់របស់ដែលគេកម្ចីនោះបានមកទារ ហើយបានយករបស់នោះទៅវិញ។ តើអ្នកដែលខ្ចីគេនោះបារម្ភពីរបស់នោះទេ? អាពូតល់ហាះបានតបវិញថា៖ អត់ទេ។ អ្នកស្រីបានបន្តទៀតថា៖ កូនរបស់អ្នកបានលាចាកលោកហើយ។ លោកក៏បានបន្តទៀតថា៖ ចុះសាកសពកូនយើងនៅឯណា? អ្នកស្រីបានបតថា៖ នៅក្នុងបន្ទប់ដេក។

គាត់បានបើកមើលមុខកូន ហើយបានសូត្រទូអាថា៖ (إِنَّا لِلَّهِ وَإِنَّا إِلَيْهِ رَاجِعُوْنَ) មានន័យថា៖ « ពិតណាស់ពួកយើង សម្រាប់អល់ឡោះ ហើយអ្វីទាំងឡាយនឹងវិលត្រឡប់ទៅរកទ្រង់»។ លុះព្រឹកឡើង គាត់បានទៅជួបអ្នកនាំសារអល់ឡោះ ហើយបាននិយាយប្រាប់គាត់ពីសម្ដីរបស់អ៊ុំមូ

សូឡែម។ អ្នកនាំសារអល់ឡោះបានមានប្រសាសន៍ថា៖ «សូមអល់ឡោះមេត្តាប្រទានពរជ័យដល់អ្នកទាំងពីរកាលពីយប់មិញ»។ ខ្ញុំបានអត់ធ្មត់ទ្រាំសង្កត់ចិត្ត។ សូហ្វយ៉ានបាននិយាយថា៖ បុរសម្នាក់មកពីពួកអាន់សើរបាននិយាយថា៖ ខ្ញុំបានឃើញគាត់ទាំងពីរមានកូនប្រាំបួននាក់។ ពួកគេទាំងអស់សុទ្ធតែបានសូត្រ គម្ពីរអាល់គួរអាន។

បពិត្រអល់ឡោះ ភាពឈ្លាសវៃរបស់អ៊ុម្មូសូឡែមអីក៏អស្ចារ្យនិងវិសេសវិសាលម្ល៉េះ? តើមានដំណឹងណាអាក្រក់ជាងដំណឹងដែលគេប្រាប់ឪពុកថា កូនរបស់គាត់ស្លាប់នោះទេ? ដំណឹងនេះពិតជាមានឥទ្ធិពលអាក្រក់ និងគួរឱ្យតក់ស្លុតយ៉ាងខ្លាំងដល់ឪពុក! តែហេតុអ្វីបានដំណឹងដ៏សែនឈឺចាប់នេះ អាពូតល់ហាះបែរជាទទួលដោយពេញចិត្តនិងសុខចិត្តទៅវិញ? តើគុណសម្បត្តិនេះសម្រាប់អ្នកណា? គឺសម្រាប់ប្រពន្ធរបស់គាត់អ៊ុម្មូសូឡែម។ សំនួរដំបូងបង្អស់របស់ប្តីដែលទើបតែត្រឡប់មកផ្ទះវិញគឺសួរពីកូនរបស់គាត់ដែលឈឺថា៖ តើកូនខ្ញុំយ៉ាងម៉េចទៅហើយ? តើគាត់បានតបទៅប្តីវិញថា វាបានស្លាប់ហើយឬ? ភាពឈ្លាសវៃរបស់

អុំមូសូទ្បែមគឺគាត់មិនបានប្រាប់ដំណឹងសោកសៅនេះទៅប្ដី ដែលទើបតែត្រទ្បប់មកពីធ្វើការនឿយហត់ និងខ្វាយខ្វល់នោះទេ។ ក៏ប៉ុន្ដែក្នុងពេលតែមួយគាត់មិនបានកុហកប្ដីរបស់គាត់ដែរ។ តើគាត់និយាយថាម៉េច?

គាត់បាននិយាយថា កូនយើងនៅដូចដើមអីចឹង អត់អីទេ។ ជាសម្ដីនិយាយបញ្ចៀងឱ្យប្ដីស្ងប់ចិត្តចំពោះកូនរបស់គាត់ ដោយមិនបាននិយាយកុហក។ តាមពិតការស្លាប់របស់គេមានន័យថាគេនៅដូចដើមអីចឹងមែន។ សូមមើលអ្នកស្រីវិញម្ដង មុននឹងគាត់ប្រាប់ប្ដីគឺគាត់បានរៀបចំអាហារពេលល្ងាចឱ្យប្ដីទទួលទាន។ បើសិនជាគាត់ប្រាប់ថា កូនស្លាប់មុនពិសារបាយ ប្ដីគាត់ច្បាស់ជាអួលដើមកលែងហូបអ្វីទាំងអស់។ មិនតែប៉ុណ្ណោះ គាត់បាននិយាយរាក់ទាក់ថ្នាក់ថ្នមប្ដីរបស់គាត់ដូចដែលប្ដីនិងប្រពន្ធទូទៅថ្នាក់ថ្នមគ្នា។

ពិតណាស់ ប្ដីរបស់គាត់ត្រៀមខ្លួនជាស្រេចដើម្បីទទួលយកនូវដំណឹងដ៏ខ្លោចផ្សានេះ វាជាទំនុកចិត្តដំបូងដែលគាត់បានផ្ដល់ឱ្យស្វាមីរបស់គាត់។ គាត់បានផ្ដើមដោយសម្ដីដែលធ្វើឱ្យប្ដីគាត់ស្ដប់ចិត្ត និងព្រមទទួលនូវព្រះលិខិតដែល

អល់ឡោះបានចារ។ គាត់បានសួរប្តីរបស់គាត់ថា៖ បើសិនជាម្ចាស់បញ្ញើបានមកសុំទារបញ្ញើនោះទៅវិញ តើអ្នកដែលត្រូវគេមកសុំទារបញ្ញើនោះគួរកើតទុក្ខពិបាកចិត្តទេ? នៅពេលនោះអាពូតល់ហះបានតបវិញថា៖ អត់ទេ។ គាត់បានប្រាប់ប្តីថា៖ កូនរបស់គាត់បានស្លាប់ទៅហើយ។ ពីព្រោះកូនរបស់គាត់ជាបញ្ញើអំពីអល់ឡោះ ហើយអល់ឡោះបានយកបញ្ញើរបស់ទ្រង់ត្រឡប់ទៅវិញ។

បងប្អូនស្ត្រីដែលមានប្តី និងប្អូនៗស្ត្រីដែលនឹងរៀបអាពាហ៍ពិពាហ៍ ប្អូនៗដឹងទេ? តើប្អូនៗនឹងទទួលប្តីរបស់ប្អូនយ៉ាងដូចម្តេច?

## គំរូសម្រាប់ប្រពន្ធគ្រប់លក្ខណ៍

គំរូនេះសម្រាប់ស្ត្រី ខ្ញុំគិតថា នៅសម័យបច្ចុប្បន្ននេះដូចជាមិនមានគំរូនេះទេ ក៏ប៉ុន្តែខ្ញុំលើកមកសរសេរនៅទីនេះដើម្បីយើងយកគំរូតាម៖ មានរឿងយ៉ាត់មួយនិយាយថា៖ នៅថ្ងៃមួយសូរេសអាល់កោទីយ៍បានជួបជាមួយសាក់ពីយ៍។ សាក់ពីយ៍បានសួរសុខទុក្ខក្នុងផ្ទះរបស់គាត់។ គាត់ក៏បាន

ឆ្លើយថា៖ «ជាង២០ឆ្នាំហើយខ្ញុំមិនដែលឃើញគ្រួសាររបស់ខ្ញុំធ្វើឱ្យខ្ញុំខឹងទេ»។ សាក់ពីយ៍បានសួរទៀតថា៖ តើរឿងនោះវា យ៉ាងម៉េច? សូរេសបានប្រាប់ថា តាំងពីយប់ដំបូងដែលខ្ញុំបានរួមរស់ជាមួយនាង ខ្ញុំបានឃើញនាងជាស្ត្រីម្នាក់មានរូបឆោមស្អាតឥតខ្ចោះ គួរឱ្យបេតី។ ខ្ញុំបានគិតក្នុងចិត្តថា ខ្ញុំនឹងសម្អាតខ្លួនហើយខ្ញុំសឡាតពីរ៉ក់អាត់ដើម្បីអគុណចំពោះអល់ឡោះ។ នៅពេលខ្ញុំឱ្យសាឡាមខ្ញុំក៏បានឃើញប្រពន្ធខ្ញុំសឡាតដូចដែលខ្ញុំសឡាតដែរ ហើយនាងឱ្យសាឡាមដូចដែលខ្ញុំឱ្យសាឡាមដែរ។ នៅពេលដែលបងប្អូននិងមិត្តភក្តិបានចេញពីផ្ទះអស់ ខ្ញុំបានអង្គុយជិតនាង ខ្ញុំក៏បានយកដៃទៅឱបនាង នាងក៏បាននិយាយថា អាពូ អូមែយ៉ះ សូមអត់ធ្មត់បន្តិច។ បន្ទាប់មកនាងបានបន្តថា ការសរសើរទាំងឡាយសម្រាប់អល់ឡោះ ខ្ញុំសរសើរទ្រង់ និងសុំជំនួយពីទ្រង់ ហើយខ្ញុំប្រសិទ្ធពរជ័យជូនដល់ព្យាការីមូហាំម៉ាត់និងសាច់ញាតិរបស់គាត់។ ខ្ញុំជាស្ត្រីចម្លែកមិនដែលស្គាល់គ្នាខ្ញុំមិនទាន់ដឹងពីចរិតរបស់អ្នក។ ចូរអ្នកបកស្រាយប្រាប់ខ្ញុំពីអ្វីដែលអ្នកស្រលាញ់ពេញចិត្ត ដើម្បីខ្ញុំអនុវត្តវា ហើយអ្វី

ដែលអ្នកស្អប់មិនពេញចិត្ត ដើម្បីខ្ញុំនឹងបោះបង់ចោល។ នាងបានបន្តថា ជាការពិតណាស់នៅក្នុងកុលសម្ព័ន្ធរបស់អ្នក មានស្ត្រីដែលអ្នកគួររៀបការជាមួយនាង ហើយក្នុងកុលសម្ព័ន្ធរបស់ខ្ញុំក៏មានបុរសដែលខ្ញុំគួររៀបការជាមួយដែរ។ ក៏ប៉ុន្តែ អ្វីៗគ្រប់យ៉ាងអាស្រ័យលើវាសនាដែលអល់ឡោះបានកំណត់។ ពិតណាស់ ខ្ញុំក្លាយជាកម្មសិទ្ធិរបស់អ្នកហើយ ចូរអ្នកធ្វើតាមអ្វីដែលអល់ឡោះបានបង្គាប់ប្រើ។ រួមរស់ជាមួយគ្នាដោយល្អប្រសើរ ឬក៏លែងលះដោយល្អប្រសើរដែរ។ ខ្ញុំសូមនិយាយពាក្យប៉ុន្មានម៉ាត់នេះ ហើយខ្ញុំសូមពីអល់ឡោះជាម្ចាស់ទ្រង់មេត្តាអភ័យទោសសម្រាប់រូបខ្ញុំនិងសម្រាប់អ្នក ។

សួរេសបាននិយាយថា នៃសាក់ពីយ៍ ខ្ញុំស្បថនឹងអល់ឡោះ ឯងបង្ខំខ្ញុំឱ្យនិយាយត្រង់ចំណុចនេះ ខ្ញុំក៏បាននិយាយថា ការសរសើទាំងឡាយសម្រាប់អល់ឡោះ ខ្ញុំសរសើរចំពោះទ្រង់ និងសុំជំនួយពីទ្រង់ ហើយខ្ញុំសូមប្រសិទ្ធពរជ័យសិរីសួស្ដីកើតមានដល់ណាពីនិងសាច់ញាតិរបស់គាត់។ ជាបន្ត៖ ពិតណាស់ បើសិនជាសម្ដីរបស់អ្នកពិតដូចជាអ្នកថាមែននោះ អ្នកនឹងទទួលបានសំណាងល្អ តែបើសិនជាអ្នក

និយាយមិនពិតវិញសម្តីនោះនឹងជាភស្តុតាងទៅលើអ្នកវិញ។ ខ្ញុំស្រលាញ់អីចេះមួយ អីចុះមួយ ហើយខ្ញុំមិនពេញចិត្តអីចេះមួយ អីចុះមួយ។ អ្វីដែលអ្នកបានឃើញអំពីប្រការល្អ ចូរអ្នកផ្សព្វផ្សាយវាចុះ ក៏ប៉ុន្តែអ្វីដែលអ្នកបានឃើញអំពីប្រការអាក្រក់ សូមជួយបិទបាំងផង។ នាងបានបន្តទៀតថា តើពេលទៅសួរសុខទុក្ខក្រុមគ្រួសាររបស់ខ្ញុំអ្នកពេញចិត្តយ៉ាងម៉េច? ខ្ញុំបានឆ្លើយថា ខ្ញុំមិនចង់ឱ្យពួកសាច់ថ្លៃរបស់ខ្ញុំមករំខានខ្ញុំទេ។ នាងក៏បានបន្តទៀតថា តើអ្នកជិតខាងបែបណាដែលអ្នកអនុញ្ញាតឱ្យគេចូលក្នុងផ្ទះរបស់អ្នក ដើម្បីខ្ញុំអនុញ្ញាតឱ្យគាត់ចូល ហើយនរណាដែលអ្នកមិនពេញចិត្ត ដើម្បីខ្ញុំមិនឱ្យគាត់ចូលក្នុងផ្ទះ? ខ្ញុំបានឆ្លើយថា កូនចៅរបស់អ្នកនេះល្អ ហើយកូនចៅរបស់អ្នកនោះមិនល្អ។ សួរេសបាននិយាយថា ខ្ញុំបានរួមដំណេកជាមួយនាងក្នុងរាត្រីដ៏មានសេចក្តីសុខបំផុត។ ខ្ញុំបានរស់នៅជាមួយនាងរយៈពេលមួយឆ្នាំខ្ញុំមិនដែលប្រទះឃើញអ្វីក្រៅពីអ្វីដែលខ្ញុំស្រលាញ់នោះទេ។ លុះនៅដើមឆ្នាំក្រោយ ខ្ញុំបានត្រឡប់មកពីតុលាការវិញ ខ្ញុំបានឃើញស្ត្រីម្នាក់នៅក្នុងផ្ទះ ខ្ញុំក៏បាន

សួរថា តើគាត់ជានណា?ពួកគេប្រាប់ថា គាត់ជាម្ដាយក្មេករបស់អ្នក ។ ពេលនោះគាត់បានបែរមករកខ្ញុំ ហើយគាត់ក៏បានសួរខ្ញុំថាតើប្រពន្ធរបស់ឯងយ៉ាងម៉េចដែរ? ខ្ញុំក៏បានឆ្លើយថា ជាប្រពន្ធល្អបំផុត ម្ដាយក្មេកគាត់បន្តថា នែអាពូអូមៃយ៉ះ គ្មានអ្វីអាក្រក់សម្រាប់ស្ត្រីជាងមានស្ថានភាពពីរយ៉ាងនេះទេ គឺនៅពេលដែលនាងសម្រាលកូន ឬនៅពេលដែលនាងទទួលបានការអនុគ្រោះពីប្ដី។ សូមស្បថចំពោះអល់ឡោះ គ្មានអ្វីអាក្រក់ជាងមានស្ត្រីម្ទិកម្ទក់នៅក្នុងផ្ទះនោះទេ។ ចូរអប់រំប្រដៅគេតាមការគួរទៅចុះ។

ប្រពន្ធរបស់ខ្ញុំរស់នៅជាមួយខ្ញុំអស់រយៈពេល២០ឆ្នាំ ខ្ញុំមិនដែលស្ដីបន្ទោសឱ្យនាង លើកលែងតែម្ដងគត់ ហើយកាលម្ដងនោះខ្ញុំជាអ្នកខុសបំពានលើនាង។

ចង់ក្លាយជាប្ដីគេត្រូវតែជាប្ដីបែបនេះ។

ចង់ក្លាយជាប្រពន្ធគេត្រូវតែជាប្រពន្ធបែបនេះ

ហើយចង់ក្លាយជាម្ដាយគេត្រូវតែជាម្ដាយបែបនេះ។

# ការតុបតែងខ្លួនសម្រាប់ប្ដី

ស្ត្រីភាគច្រើននៅសម័យនេះមិនចេះពីវិធីសម្អិតសម្អាង តុបតែង បាញ់ទឹកអប់សម្រាប់ប្ដីរបស់គេនោះទេ លើកលែងតែនៅពេលមានពិធីអ្វីមួយតែប៉ុណ្ណោះ។

គួរឱ្យចម្លែកជាងនោះទៅទៀត គេបានអង្គុយឆ្លុះកញ្ចក់សិតសក់ ជ្រើសរើសសម្លៀកបំពាក់ណាដែលស្អាតជាងគេ - រីឯសម្រាប់ប្ដីវិញគ្មានអ្វីគួរឱ្យទាក់ទាញសោះ គឺគេស្លៀកសម្លៀកបំពាក់ចំអិនអាហារ ជុំក្លិនខ្ទឹមស លាយខ្ទឹមក្រហម និងមានអ្វីផ្សេងៗទៀត។

ខ្ញុំមិនដឹងទេ តើគេបង្គាប់ឱ្យប្រពន្ធតុបតែងក្នុងកម្មវិធីផ្សេងៗឬក៏គេបង្គាប់ឱ្យយកចិត្តទុកដាក់ចំពោះប្ដី?

ប្រពន្ធដែលឈ្លាសវៃគឺជាប្រពន្ធដែលចេះយកចិត្តប្ដី ហើយគេជាប្រពន្ធថ្មីជានិច្ចក្នុងជីវិតប្ដីរបស់នាង។ សម្ដីពីរោះផ្អែមល្ហែមទន់ភ្លន់ជាសោភ័ណភាពរបស់នាង។ ការញញឹមទៅរកប្ដីជាសម្រស់ដ៏ស្រស់ស្អាតរបស់នាង។ ក្លិនក្រអូបឈ្ងុយឈ្ងប់ជាភាពស្រស់ស្រាយ។ សម្លៀកបំពាក់ស្អាតគួរឱ្យទាក់ទាញ និងការស្ទាបអង្អែលថ្នមៗលើសក់ ហើយការ

ជ្រើសរើសពេលវេលាសមស្របពាក់ឈុតសិកស៊ី។ ទាំងនេះជាសកម្មភាពដើម្បីទាក់ទាញអារម្មណ៍របស់ប្ដី។

## សិទ្ធិប្ដីចំពោះប្រពន្ធ

ជាការពិតណាស់ សិទ្ធិប្ដីចំពោះប្រពន្ធគឺធំធេងជាងសិទ្ធិប្រពន្ធចំពោះប្ដី។ ដោយអល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា៖

﴿ وَلِلرِّجَالِ عَلَيْهِنَّ دَرَجَةٌ وَاللَّهُ عَزِيزٌ حَكِيمٌ ﴾ البقرة: ٢٢٨

មានន័យថា៖

«សម្រាប់បុរសមានឋានៈលើសស្ដ្រីមួយកម្រិត»។

អ្នកនាំសាររបស់អល់ឡោះបានមានប្រសាសន៍ថា៖

قال رسول الله صلى الله عليه وسلم : ( لو كنت آمراً أحداً أن يسجد لأحد لأمرت المرأة أن تسجد لزوجها ) [رواه الترمذي]

មានន័យថា៖ «បើសិនជាខ្ញុំប្រើឱ្យនរណាម្នាក់ក្រាបគោរពនរណាម្នាក់ទៀតគឺខ្ញុំច្បាស់ជាប្រើឱ្យប្រពន្ធក្រាបគោរពប្ដី»។ (រីវ៉ាយ៉ាត់អាត់ត្ញរមីហ្សីយ៍)

អ្នកនាំសារបានមានប្រសាសន៍ថា៖

قال صلى الله عليه وسلم:(إذا باتت المرأة مهاجرة فراش زوجها لعنتها الملائكة حتى تصبح) [رواه الترمذي]

មានន័យថា៖ « ស្ត្រីណាដែលប្រកែកមិនព្រមរួមដំណេកជាមួយប្តីរបស់គេ គឺទេវតាដាក់បណ្តាសារូបគេរហូតដល់ពេលព្រឹក»។ (រីវ៉ាយ៉ាត់អាត់តួរមីហ្សីយ៍)

ម្តាយមីងរបស់ហូសេន ពិន មុះសន់បាននិយាយប្រាប់អ្នកនាំសាររបស់អល់ឡោះពីប្តីរបស់គាត់។

អ្នកនាំសាររបស់អល់ឡោះបានតបទៅគាត់វិញថា៖

وقالت عمة حصين بن محصن وذكرت زوجها للنبي صلى الله عليه وسلم : فقال (انظري أين أنت منه فأنه جنتك ونارك) [رواه أحمد والنسائى]

មានន័យថា៖ « ចូរអ្នកពិនិត្យមើលការប្រតិបត្តិរបស់អ្នកចំពោះប្តីរបស់អ្នកមានកម្រិតណា។ ព្រោះគេជាឋានសួគ៌របស់អ្នក និងជាឋាននរករបស់អ្នក»។ (រីវ៉ាយ៉ាត់អះម៉ាត់ និងអាន់ណាសាអ៊ីយ៍)។

អ្នកនាំសាររបស់អល់ឡោះបានមានប្រសាសន៍ទៀតថា៖

وقال صلى الله عليه وسلم : (نساؤكم من أهل الجنة الودود التي إذاأوذيت أوآذت أتت زوجها حتى تضع يدها في كفه فتقول لاأذوق غمضا حتى ترضى) [رواه الطبراني]

មានន័យថា៖ «ស្ត្រីរបស់ពួកអ្នកជាអ្នកដែលបានចូលឋានសួគ៌ គឺស្ត្រីដែលនៅពេលណាត្រូវគេបញ្ឈឺឬក៏ទៅបញ្ឈឺគេ រួចហើយនាងបានមកជួបប្តីដោយដាក់ដៃរបស់គេក្នុងបាតដៃរបស់ប្តី ហើយនិយាយថា ខ្ញុំមិនភ្លក់រសជាតិដេកនោះទេ លុះត្រាលោកប្តីព្រមអភ័យទោស»។ (រីវ៉ាយ៉ាត់អាត់ទប់រ៉នីយ៍)។

អ្នកនាំសារបានមានប្រសាសន៍ទៀតថា៖

وقال صلى الله عليه وسلم :(اثنان لاتجاوز صلاتهما رءوسهما عبد أبق من مواليه حتى يرجع وامرأة عصت زوجها حتى ترجع) [الحاكم وصححه الألباني]

មានន័យថា៖ «ពីរប្រភេទដែលគេមិនទទួលយកសឡាតគឺខ្ញុំបម្រើដែលបានរត់ចោលចៅហ្វាយរបស់ខ្លួន រហូតដល់គេត្រឡប់មកវិញ និងប្រពន្ធមិនស្តាប់បង្គាប់ប្តី រហូតដល់

នាងទទួលកំហុស»។ (អាល់ហាគីម ហើយចាត់ទុកជាហាទីសសហេះដោយអាល់ហ្គានីយ៍)។

អ្នកនាំសារបានមានប្រសាសន៍ទៀតថា៖

**وقال صلى الله عليه وسلم :( لو كنت آمراً أحداً أن يسجد لأحد لأمرت المرأة أن تسجد لزوجها من أعظم حقه عليها ولايجد حلاوة الإيمان حتى تؤدي حق زوجها ولوسألها نفسها وهي على ظهر قتب )**

**[رواه أحمد]**

មានន័យថា៖ «បើសិនជាខ្ញុំប្រើនរណាម្នាក់ឱ្យគោរពនរណាម្នាក់ផ្សេងទៀតគឺខ្ញុំច្បាស់ជាប្រើឱ្យប្រពន្ធក្រាបគោរពប្តីដោយយោងទៅលើសិទ្ធិដ៏ធំធេងរបស់ប្តីចំពោះប្រពន្ធ។ នាងមិនស្គាល់រសជាតិផ្អែមល្ហែមនៃជំនឿនៅឡើយទេ លុះត្រាតែនាងបំពេញកាតព្វកិច្ចចំពោះប្តី ទោះបីជាប្តីនាងសុំរួមដំណេក ហើយនាងកំពុងនៅលើខ្នងអូដ្ឋក៏ដោយ»។ (រីវ៉ាយ៉ាត់អះម៉ាត់)

ការបកស្រាយខាងលើបញ្ជាក់ឱ្យយើងឃើញថា សិទ្ធិរបស់ប្តីគឺធំធេងណាស់។ ដូច្នោះចាំបាច់លើប្រពន្ធត្រូវតែស្វែងរកការយល់ព្រមរបស់ប្តី ត្រូវបំពេញសិទ្ធិរបស់ប្តីមុននឹង

សិទ្ធិខ្លួនឯង និងសិទ្ធិសាច់ញាតិរបស់ប្តី។ ត្រូវត្រៀមខ្លួនបំពេញសិទ្ធិនិងកាតព្វកិច្ចទាំងនោះដោយស្មោះត្រង់ដើម្បីឱ្យប្តីពេញចិត្ត និងរីករាយ។ មិនប្រអឺតក្រទមដាក់ប្តី មិនត្រូវប្រើសម្តីថ្លោះដាមួយប្តីដូចជាស្ត្រីកម្សោយសាសនា គ្មានសតិបញ្ញាមួយចំនួនបានធ្វើចំពោះប្តីទាំងឡាយ។

## សំនួរចម្លើយមានសារប្រយោជន៍

## តើស្ត្រីណាស្រស់ស្អាតជាងគេ?

ភាពស្រស់ស្អាតគឺស្រស់ស្អាតខាងចរិយាសម្បត្តិ ការអប់រំ និងក្រមសីលធម៌។ ស្ត្រីគ្រប់រូបតែងតែមានចំណុចស្រស់ស្អាតរបស់ខ្លួន ក្នុងលក្ខខណ្ឌដែលស្ត្រីនោះត្រូវសម្តែងឡើង និងថែរក្សាការពារនូវចំណុចស្រស់ស្អាតនេះ។ ចំណែកឯភាពស្រស់ស្អាតខាងរូបសម្ផស្ស ថ្វីបើរូបសម្ផស្សស្អាតមានឥទ្ធិពលទាក់ទាញលឿន តែមិនអាចឈានទៅដល់កម្រិតនៃភាពស្រស់ស្អាតខាងចរិយាសម្បត្តិនោះទេ ទាំងសម្ផស្សភាពស្គុះស្គាយ និរន្តរភាពរបស់វា។

## តើស្ត្រីណាដែលមានសុភមង្គលជាងគេ?

គឺជាស្ត្រីដែលសេចក្ដីស្រលាញ់បែបមនុស្សជាតិរបស់គេផុសចេញពីក្នុងក្រអៅបេះដូង មានប្រភពចេញពីនិស្ស័យពីកំណើតប្រៀបបាននឹងពន្លឺដែលបំភ្លឺរូបនាង និងពិភពស្ត្រីឱ្យភ្លឺត្រចះត្រចង់ពោរពេញដោយពន្លឺ ភាពស្រស់ស្អាតក្ដីអាណិតស្រលាញ់ ផូរផង់ និរន្តរភាព ពោរពេញដោយសេចក្ដីស្រលាញ់ និងការគោរពប្រតិបត្តិចំពោះព្រះជាម្ចាស់របស់នាង។

## តើស្ត្រីណាដែលអភ័ព្វជាងគេ?

ស្ត្រីដែលអភ័ព្វជាងគេគឺស្ត្រីដែលប្រាសចាកពីភាពជាស្ត្រីរបស់ខ្លួន នាងយល់ច្រឡំថា ការដើរហើរដោយសេរីរបស់នាងគឺជាផ្លូវដ៏ឆាប់បំផុតដើម្បីធ្វើឱ្យប្រុសៗចាប់ចិត្តស្រលាញ់។ តាមពិត សិទ្ធិសេរីភាពគ្មានព្រំដែននេះធ្វើឱ្យបុរសយល់ខុសចំពោះកេរ្ដិ៍ឈ្មោះរបស់នាង នាងជាស្ត្រីដែលគ្មានតម្លៃក្នុងចិត្តរបស់បុរស។ ជាការពិតណាស់ ស្ត្រីអភ័ព្វគឺជាស្ត្រីដែលខ្ជះខ្ជាយ លះបង់អ្វីគ្រប់យ៉ាងដើម្បីតុបតែងខ្លួនបែបបរទេស

ស្រលាញ់ភាពល្បីល្បាញ ហើយបង្ហាញខ្លួនជ្រុលពេកស្ទើរក្លាយជាមនុស្សឆ្កួត។

## តើសុភាពនារី គួរធ្វើដូចម្តេច ចំពោះចំណុចខ្វះខាតរបស់ប្តី?

នៅទីនេះគឺភាពឆ្លាតវៃរបស់ប្រពន្ធបានស្តែងឡើងក្នុងការកែលម្អឥរិយាបថមួយចំនួន និងអត់ធ្មត់ក្នុងការដោះស្រាយស្ថានភាពនេះ។ នាងចាំបាច់ត្រូវធ្វើឱ្យភាពជោគជ័យជាមិត្តមេត្រីភាពរបស់នាង។ ជាពិសេស នៅពេលដែលនាងទទួលបានទំនុកចិត្ត និងសេចក្តីស្រលាញ់ពីប្តី។ ពីព្រោះសេចក្តីស្រលាញ់បង្កើតសេចក្តីស្រលាញ់ ហើយជាមធ្យោបាយដ៏ល្អប្រសើរបំផុតក្នុងការដោះស្រាយបញ្ហា។ សាស្ត្រាចារ្យម្នាក់បាននិយាយថា៖ «សេចក្តីស្រលាញ់អាចកែតម្រង់ចិត្តរឹងរូស ដូចដែលគេអាចបំផ្លាញគ្រឿងដ៏រឹងមាំដូច្នោះដែរ។ នៅទីនេះគឺស្តែងឡើងអំពីវិធីសាស្ត្រដែលយើងប្រើប្រាស់ និងរបៀបដែលយើងស្វែងយល់អំពីសេចក្តីស្រលាញ់»។

ដោយការញញឹមដ៏ស្រស់ស្អាត និងស្នាមញញឹមដ៏រស់រវើកដែលផុសចេញពីផ្ទៃមុខរបស់នាង គឺមនុស្សអាចប៉ាន់ស្មានដឹងពីកម្រិតឥទ្ធិពលនៃការញញឹមដ៏ស្រស់ស្អាតពោរពេញដោយក្តីស្រលាញ់ដែលជ្រាបចូលយ៉ាងជ្រៅក្នុងចិត្តរបស់បុរស។ ពិតណាស់ ស្ត្រីមានសារៈសំខាន់ និងមានគុណសម្បត្តិច្រើនទាក់ទងនឹងបញ្ហានេះ។

## តើនាងត្រូវរក្សា និងផ្តល់សុភមង្គលឱ្យប្តីយ៉ាងដូចម្តេច?

ប្រពន្ធមានតួនាទីយ៉ាងសំខាន់ក្នុងការផ្តល់សុភមង្គលឱ្យប្តី និងរក្សាការពារប្តីពីការបោកប្រាស់និងការអូសទាញខាងក្រៅផ្ទះ។ ការទាក់ទាញនេះមានច្រើនរូបភាព និងច្រើនប្រភេទ និងគ្រោះថ្នាក់បំផុត។ស្ត្រីឆ្លាតវៃគឺជាស្ត្រីដែលធ្វើឱ្យប្តីភ្លេចនឹកនាដល់ការទាក់ទាញពីមជ្ឈដ្ឋានខាងក្រៅ ហើយនាងប្តូរការប្រឈមទាំងនេះជាផលប្រយោជន៍សម្រាប់នាង។ ភាពទាក់ទាញខាងក្រៅទាំងឡាយដែលធ្វើឱ្យប្តីមានអារម្មណ៍

ពុះកញ្ច្រោល តណ្ហាឆាបឆេះ ចុងបញ្ចប់នាងបានលួងលោម ឱ្យវារលត់ស្កប់ស្កល់។

ប្រពន្ធជោគជ័យគឺជាប្រពន្ធដែលស្គាល់ពីតម្រូវការនិងចំណង់ចំណូលចិត្ត និងអ្វីដែលទាក់ទាញចិត្តប្ដីដូចជាពណ៌ដែលប្ដីចូលចិត្ត សម្លៀកបំពាក់ខាងក្នុងនិងខាងក្រៅ និងរបៀបនៃការតុបតែងខ្លួន។ ជាកំហុសឆ្គងដ៏ធ្ងន់ធ្ងររបស់ប្រពន្ធមួយចំនួនដូចជាការប្រហែសមិនយកចិត្តទុកដាក់ចំពោះសម្លៀកបំពាក់ និងការតុបតែងនៅក្នុងផ្ទះ ដែលពេលប្ដីត្រឡប់មកពីធ្វើការវិញ ទទួលប្ដីដោយខ្លួនជាប់ក្លិនផ្ទះបាយសក់រញ៉េរញ៉ៃ ឬចងឱ្យតែបានរួចពីដៃ។ ហេតុនេះ អ្នកពុំបាច់ឆ្ងល់ទេ នៅពេលអ្នកប្រទះឃើញថា ប្រពន្ធស្អាត តែប្ដីរបស់ខ្លួនមិនចាប់អារម្មណ៍ បែរជាទៅចាប់អារម្មណ៍នឹងស្រីផ្សេងវិញ។ ផ្ទុយទៅវិញ ប្រពន្ធដែលមិនសូវស្អាត បែរជាអាចចងប្ដីជាប់ អាចគ្រប់គ្រងចិត្ត និងមនោសញ្ចេតនារបស់ប្ដីបាន។ ពិតណាស់ ប្រពន្ធតែមួយគត់ដែលជាអ្នកទទួលខុសត្រូវចំពោះរឿងនេះ។

យើងសូមទូន្មាននិងណែនាំដល់ស្ត្រីដែលជាប្រពន្ធទាំងឡាយត្រូវយកចិត្តទុកដាក់ជាប្រចាំចំពោះទិដ្ឋភាព និងការតុបតែងខ្លួននៅក្នុងផ្ទះ ពុំត្រូវទទួលប្តីមកពីធ្វើការវិញដោយត្អូញត្អែរពីរឿងបញ្ហាកូនចៅ ហើយត្រូវរៀបចំបរិយាកាសអំណោយផល ផាសុកភាព គួរជាទីរីករាយសម្រាប់ប្តី ដូចជារៀបចំកន្លែងសម្រាកឱ្យស្រួលបួលសម្រាប់ប្តី កុំឱ្យកូននិយាយស្រែកឡូឡាវំខានដោយប្រើឱ្យពួកគេជួយការងារផ្សេងៗ បាញ់ក្លិនទឹកក្រអូបក្នុងផ្ទះ។ ធ្វើឱ្យប្តីភ្ញាក់ផ្អើលនឹងការរៀបចំចំណីអាហារណាដែលប្តីចូលចិត្តនិងរៀបចំបរិយា-កាសអំណោយផលដើម្បីបំបាត់ការនឿយហត់ក្នុងជីវិតដែលគាត់បានជួបប្រទះជារៀងរាល់ថ្ងៃ។

# ការទូន្មានដ៏មានតម្លៃនិងមានប្រយោជន៍

## ការទូន្មានទីមួយ

អ៊ូម៉ាមាស់ ពិនទី អាល់ហារីស ជាស្ត្រីដែលមានគុណសម្បត្តិល្អប្រពៃនៅក្នុងកុលសម្ព័ន្ធអារ៉ាប់ គាត់មានពាក្យភាសិតល្បីៗជាច្រើនទាក់ទងនឹងក្រមសីលធម៌និងការអប់រំ។

នៅពេលដែលហារីស ពិន អាំរូជាស្តេចកន់ឌះបានរៀបអាពាហ៍ពិពាហ៍ជាមួយកូនស្រីរបស់គាត់ឈ្មោះ អ៊ុំមូ អ៊ីយ៉េស ពិនទី អ័ហ្វ។ ពួកគេចង់នាំនាងទៅនៅផ្ទះខាងប្តីរបស់នាង ម្តាយរបស់នាងបានផ្តែផ្តាំនាងក្នុងរាត្រីទឹកឃ្មុំជាមួយនឹងប្តីរបស់នាងនូវការផ្តែផ្តាំដ៏មានតម្លៃ ម្តាយរបស់នាងបានពោលទៅកាន់នាងថា ឱកូនស្រីមាសម្តាយ ការទូន្មាននេះ បើសិនជាគេបោះបង់វាចោលហើយនាំឱ្យមានសីលធម៌ល្អឬនាំឱ្យពូជពង្សថ្កើងថ្កាននោះ ម្តាយនឹងបញ្ចៀសវាឱ្យឆ្ងាយពីកូន។ ក៏ប៉ុន្តែដំបូន្មានគឺជាការរំលឹកចំពោះអ្នកដែលមានបញ្ញា និងជាការដាស់រំលឹកចំពោះអ្នកដែលភ្លេចភ្លាំង។

កូនមាសម្តាយ បើសិនជាស្ត្រីណាម្នាក់មិនត្រូវការប្តីដោយសារទ្រព្យសម្បត្តិដ៏ស្តុកស្តម្ភរបស់ឪពុកគេ នោះរូប

ម្ដាយគឺជាស្ត្រីដែលមិនត្រូវការប្ដី។ ក៏ប៉ុន្តែគេបង្កើតយើងមកសម្រាប់បុរស ហើយគេបង្កើតបុរសមកសម្រាប់យើង។

កូនស្រីមាសម្ដាយ កូននឹងព្រាត់ពីខណ្ឌសីម៉ាដែលកូនចេញទៅ និងចាកចេញពីសម្បុកដែលកូនធ្លាប់រស់នៅទៅកាន់ទ្រនុំផ្សេងដែលកូនមិនធ្លាប់ស្គាល់។ ដៃគូជីវិតដែលកូនមិនធ្លាប់ស្និទ្ធស្នាលនឹងគ្នាពីមុនមក។ កូនត្រូវរស់នៅជាកម្មសិទ្ធិរបស់គេដែលគេគ្រប់គ្រងកូនឯង ចូរកូនចាត់ទុកខ្លួនជាខ្ញុំបម្រើរបស់គេ ដើម្បីឱ្យគេក្លាយជាខ្ញុំបម្រើកូនវិញដ៏ស្និទ្ធស្នាល។ កូនមាសម្ដាយ ចូរចងចាំបណ្ដាំម្ដាយដប់ប្រការក្នុងការរួមរស់ជាមួយប្ដី ដែលធ្វើឱ្យគេនឹកស្រណោះ និងចាំមិនភ្លេច។

ប្រការទីមួយនិងទីពីរៈ រួមរស់ជាមួយប្ដីដោយពេញចិត្តស្ដាប់បង្គាប់ និងគោរពប្ដី។ ការពេញចិត្តនាំមកនូវសេចក្ដីរីករាយស្រស់ស្រាយនៅក្នុងចិត្ត ហើយការរួមរស់ដោយល្អប្រសើរជាមួយគ្នានាំឱ្យអល់ឡោះទ្រង់សព្វព្រះទ័យ។

ប្រការទីបីនិងទីបួនៈ ថែរក្សាខ្លួនឱ្យប្ដីមើលទៅពេញចិត្ត កុំឱ្យគេទើសភ្នែក កុំមានក្លិនខ្លួនមិនល្អ។ រក្សាខ្លួនឱ្យមាន

ក្លិនខ្លួនក្រអូបជានិច្ច។ កូនមាសម្ដាយ កូនត្រូវដឹងថា ការគូសត្របកភ្នែកនឹងពណ៌ខ្មៅជាគ្រឿងតុបតែងដែលមានស្រាប់ ហើយមុជទឹកសម្អាតខ្លួនជាគ្រឿងក្រអូបដែលគេមិនសូវគិតគូរ។

ប្រការទីប្រាំ និងទីប្រាំមួយៈ ប្រុងប្រយ័ត្នចំពោះវេលាបរិភោគអាហារនិងរៀបចំកន្លែងដេករបស់ប្ដី។ ជាការពិតណាស់កម្ដៅនៃការស្រេកឃ្លាននឹងឆាបឆេះ ហើយកន្លែងដេកគគ្រិចក៏នាំឱ្យចង្រៃដែរ។

ប្រការទីប្រាំពីរ និងទីប្រាំបីៈ ការថែរក្សាផ្ទះសម្បែងទ្រព្យសម្បត្តិរបស់ប្ដី និងការយកចិត្តទុកដាក់ចំពោះការបម្រើប្ដី និងគ្រួសារ គឺជាសោភ័ណភាពនៃភាពឈ្លាសវៃរបស់ប្រពន្ធដែលចេះរៀបចំទុកដាក់។

ប្រការទីប្រាំបួន និងទីដប់ៈ កុំនិយាយបកអាក្រាតអាថ៌កំបាំងរបស់ប្ដី ហើយកុំល្មើសនឹងការបង្គាប់របស់ប្ដី។ ពីព្រោះបើកូនបកអាក្រាតអាថ៌កំបាំងប្ដី កូននឹងមិនអាចជៀសផុតពីការក្បត់របស់គេបានទេ។ បើកូនល្មើសនឹងការបង្គាប់របស់គេ កូនបានធ្វើឱ្យក្នុងចិត្ត របស់គេកើតក្ដីក្ដៅក្រហាយ។

កូនមាសម្ដាយ កូនត្រូវប្រយ័ត្ន កុំឱ្យសប្បាយក្អាកក្អាយនៅពេលគេកើតទុក្ខ ហើយកុំឱ្យសៅហ្មងនៅពេលគេសប្បាយរីករាយ។ ទីមួយគឺការធ្វេសប្រហែស ហើយទីពីរគឺការធ្វើឱ្យល្អក់កករខូចបរិយាកាស។

រាល់ពេលដែលកូនលើកតម្កើងគេកាន់តែខ្លាំង គេគោរពកូនកាន់តែខ្លាំង ហើយរាល់ពេលដែលកូនយល់ចិត្តគេកាន់តែខ្លាំង គេរស់នៅជាមួយកូនកាន់តែយូរ។

កូនមាសម្ដាយ កូនត្រូវដឹងថា កូនមិនអាចធ្វើកើតទេ លុះត្រាតែឱ្យតម្លៃការពេញចិត្តរបស់គេជាងការពេញចិត្តរបស់កូន។ កូនត្រូវឱ្យតម្លៃចំណង់ចំណូលចិត្តរបស់គេជាងចំណង់ចំណូលចិត្តរបស់កូនទាក់ទងនឹងអ្វីដែលកូនស្រលាញ់ និងកូនស្អប់។ សូមអល់ឡោះជាម្ចាស់ទ្រង់ប្រទានសេចក្ដីល្អចម្រុងចម្រើនដល់កូន ហើយខ្ញុំសូមផ្ញើកូននឹងអល់ឡោះជាម្ចាស់។

# ការទូន្មានទីពីរ

ម្ដាយម្នាក់បានផ្ដែផ្ដាំកូនស្រីរបស់គាត់នៅពេលរៀបអាពាហ៍ពិពាហ៍ថា៖ ឱកូនស្រីជាទីស្រលាញ់! កុំភ្លេចសម្អាតខ្លួនប្រាណរបស់កូន ព្រោះការសម្អាតធ្វើឱ្យមុខស្រស់ស្អាត ធ្វើឱ្យប្ដីស្រលាញ់ ជៀសផុតពីជំងឺនានា ធ្វើឱ្យសុខភាពផ្លូវកាយមាំមួនក្នុងការបំពេញការងារ។ ស្ត្រីដែលមានក្លិនខ្លួនអាក្រក់ ធ្វើឱ្យអារម្មណ៍ប្ដីខ្ពើមរអើម គេមិនចង់គន់មើល ហើយមិនចង់និយាយរក។ នៅពេលកូនទទួលប្ដី កូនត្រូវទទួលគេដោយការញញឹមរាក់ទាក់។ ជាការពិតណាស់ សេចក្ដីស្នេហាប្រៀបបាននឹងរូបកាយ ហើយការញញឹមរាក់ទាក់គឺជាព្រលឹងនៃសេចក្ដីស្នេហា។

## ផលអាក្រក់នៃអំពើបទល្មើសចំពោះសុភមង្គលគ្រួសារ

គ្មាននរណាម្នាក់ខ្វែងយោបល់គ្នាទេថា អំពើអាក្រក់នាំមកនូវទុក្ខព្រួយ បារម្ភខ្វល់ខ្វាយ បង្កឱ្យកើតអពមង្គល និងទុក្ខលំបាកវេទនា ហើយធ្វើឱ្យទឹកមុខក្រៀមក្រមស្រពាប់ស្រពោន និងចិត្តកោងកាចសាហាវគ្មានក្តីមេត្តា។ សុភមង្គលប្រែជាអពមង្គល ស្រលាញ់ប្រែជាស្អប់។ល។

បុព្វបុរសជំនាន់ដើមម្នាក់បាននិយាយថា៖ ខ្ញុំបានប្រព្រឹត្តល្មើសនឹងអល់ឡោះ ហើយប្រទះឃើញឥទ្ធិពលនៃអំពើនេះកើតមានចំពោះប្រពន្ធខ្ញុំនិងសត្វពាហនៈរបស់ខ្ញុំ។

អិបនូ កៃយិមបាននិយាយថា៖ សម្រាប់អំពើអាក្រក់មានឥទ្ធិពលអាក្រក់ និងគួរឱ្យស្តីបន្ទោស ធ្វើឱ្យគ្រោះថ្នាក់ដល់ផ្លូវចិត្ត និងផ្លូវកាយទាំងនៅក្នុងលោកនេះ និងនៅបរលោកដែលគ្មាននណាម្នាក់ដឹងរឿងនេះលើកលែងតែអល់ឡោះជាម្ចាស់។

ផលអាក្រក់នេះមានដូចជា រៀនមិនចេះ។ ពិតណាស់ចំណេះដឹងគឺជាពន្លឺដែលអល់ឡោះបានបញ្ជ្រាបទៅក្នុងចិត្ត

ហើយអំពើអាក្រក់ជាអ្នកពន្លត់ពន្លឺនេះ។

ផលអាក្រក់មួយទៀតៈ ភាពឯកោដែលនៅរួមរឹតក្នុងចិត្តរបស់អ្នកប្រព្រឹត្តអំពើអាក្រក់។ រវាងខ្លួនគេនឹងអស់ឡោះគ្មានភាពស្រណុកណាដែលយកទៅថ្លឹង ហើយយកទៅផ្ទឹមនឹងភាពឯកោនេះបានឡើយ។ បើទោះជាគេប្រមូលភាពស្រណុកទាំងអស់ដែលមាននៅលើពិភពលោកនេះគឺមិនអាចយកទៅបំបាត់ភាពឯកោនោះបានឡើយ។ បញ្ហានេះគ្មាននរណាម្នាក់យល់លើកលែងតែអ្នកដែលដួងចិត្តរបស់គេមានជីវិត។ ដូចជារបួសដែលមិនធ្វើឱ្យសាកសពឈឺចាប់នោះដែរ។ បើសិនជាគេបោះបង់អំពើបាបដោយគ្រាន់តែខ្លាចក្រែងចំពោះភាពឯកោនោះ អ្នកមានបញ្ញាច្បាស់ជានឹងបោះបង់វាដោយគ្មានការស្ទាក់ស្ទើរក្នុងចិត្ត។

ផលអាក្រក់ផ្សេងទៀតៈ ភាពឯកោដែលកើតមានរវាងរូបគេនឹងមនុស្សទូទៅ ជាពិសេសមនុស្សល្អក្នុងចំណោមពួកគេ គឺកើតមានភាពឯកោនេះរវាងរូបគេនឹងពួកអ្នកទាំងនោះ។ រាល់ពេលដែលភាពឯកោនោះកាន់តែខ្លាំង រូបគេកាន់តែឃ្លាតឆ្ងាយពីពួកគេ នឹងកាន់តែឃ្លាតឆ្ងាយពីការសេព

គប់ជាមួយពួកគេ ហើយគេព្រាត់ឆ្ងាយពីពរជ័យ និងផល ប្រយោជន៍របស់ពួកគេ។ ម្យ៉ាងទៀតកាន់តែខិតជិតទៅ រកបក្សពួកបិសាចសៃ្សតានតាមកម្រិតដែលខ្លួនគេបានឃ្លាត ឆ្ងាយពីបក្សពួកអល់ឡោះ។ ភាពឯកោនេះកាន់តែខ្លាំងឡើង រហូតដល់ភាពឯកោនេះគ្រប់គ្រងលើខ្លួនរបស់គេ ហើយ ភាពឯកោនេះជារនាំងបាំងរូបគេពីប្រពន្ធកូន បងប្អូនសាច់ ញាតិ ខ្លួនគេមានអារម្មណ៍ឯកោចំពោះខ្លួនឯង។ ដូច្នេះ អ្នកនឹងឃើញថា ខ្លួនគេជាមនុស្សឯកោ។

ផលអាក្រក់ម្យ៉ាងទៀត៖ កិច្ចការទាំងឡាយពិបាក ចំពោះខ្លួនគេ រាល់ពេលដែលគេប្រឈមមុខនឹងការងារអ្វី មួយ គេប្រឈមនឹងការងារនោះដោយភាពងងឹត ឬពិបាក ធ្វើមិនកើត គឺគេមានសភាពបែបនេះឯង។ ដូចអ្នកដែល កោតខ្លាចចំពោះអល់ឡោះ គឺទ្រង់ប្រទានភាពងាយស្រួល សម្រាប់រាល់កិច្ចការរបស់គេ។ ឯចំណែកអ្នកដែលគ្មានការ កោតខ្លាចចំពោះអល់ឡោះ គឺទ្រង់ធ្វើឱ្យកិច្ចការរបស់គេជួប ប្រទះតែនឹងសេចក្ដីលំបាក។ ឱអល់ឡោះជាម្ចាស់ ពិតជាគួរ ឱ្យចម្លែកណាស់! ហេតុអ្វីបានមនុស្សយើងប្រទះនឹងទ្វារនៃ

សេចក្តីល្អនិងគុណធម៌នោះត្រូវបិទជិត ហើយផ្លូវដើររបស់គេជួបប្រទះនឹងសេចក្តីលំបាក ហើយគេនៅតែមិនដឹងខ្លួនថា តើវាកើតមកពីណា?

ផលអាក្រក់ផ្សេងទៀត៖ ភាពងងឹតក្នុងចិត្តរបស់គេគឺជាភាពងងឹតពិត មានអារម្មណ៍ដឹងជាក់ដូចជាភាពងងឹតនៃពេលយប់អាធ្រាត។ ភាពងងឹតនៃអំពើអាក្រក់កើតមានជាក់ស្តែងក្នុងចិត្តរបស់គេដូចជាភាពងងឹតដែលប្រទះឃើញពិតនឹងភ្នែករបស់គេ។ ពិតណាស់ ការគោរពប្រតិបត្តិគឺជាពន្លឺ ហើយការប្រព្រឹត្តអំពើអាក្រក់គឺជាភាពងងឹត។ រាល់ពេលដែលភាពងងឹតកាន់តែកើនឡើង ភាពច្របូកច្របល់ខ្វល់ខ្វាយក្នុងខ្លួនគេកាន់តែខ្លាំងឡើងដែរ រហូតដល់ធ្លាក់ខ្លួនទៅក្នុងអំពើប្រឌិតថ្មីខុសនឹងច្បាប់សាសនា វង្វេងផ្លូវ ធ្លាក់ខ្លួនទៅក្នុងអំពើវិនាសដោយមិនដឹងខ្លួន។ ប្រៀបដូចជាមនុស្សខ្វាក់ភ្នែកដែលដើរក្នុងពេលយប់ងងឹតតែម្នាក់ឯង។ ភាពងងឹតកាន់តែខ្លាំងឡើងរហូតដល់ផុសចេញតាមភ្នែករបស់គេ ហើយភាពងងឹតនេះកាន់តែក្រាស់ខ្លាំងឡើងរហូតផុសឡើងតាមទឹកមុខរបស់គេ រហូតក្លាយជាចំណុចខ្មៅៗចេញលើ

មុខរបស់គេ។

អាប់ឌុលឡោះ ពិន អាហ្គើសបាននិយាយថា៖ «ពិតណាស់ អំពើល្អមានស្នាមពន្លឺជាប់នៅនឹងមុខ ពន្លឺក្នុងចិត្ត ជួយឱ្យជីវភាពធូរធារ សុខភាពផ្លូវកាយមាំមួន ជាទីស្រលាញ់ពេញចិត្តនៃមនុស្សលោកទូទៅ។ ចំណែកឯអំពើអាក្រក់វិញ បន្សល់ស្លាកស្នាមពណ៌ខ្មៅលើផ្ទៃមុខ ងងឹតក្នុងចិត្ត សុខភាពផ្លូវកាយទ្រុតទ្រោម ជីវភាពខ្វះខាត និងធ្វើឱ្យដួងចិត្តមនុស្សទាំងឡាយស្អប់ខ្ពើមមិនពេញចិត្ត»។

ផលអាក្រក់មួយទៀត៖ អំពើអាក្រក់កាត់បន្ថយអាយុ បំផ្លាញពរជ័យ ហើយចាំបាច់ត្រូវតែកើតឡើងបែបនេះ។ ពិតណាស់អំពើល្អនាំឱ្យមានអាយុវែង ហើយអំពើអាក្រក់ឱ្យអាយុខ្លី។

# អំពើអាក្រក់មួយចំនួនដែលរីកសុសសាយនាពេលបច្ចុប្បន្ន

- បោះបង់ចោលសទ្បាតឬពន្យារពេលសទ្បាត។
- បោះបង់ការបរិច្ចាគទ្រព្យសម្បត្តិ និងប្រងើយកន្តើយចំពោះការបរិច្ចាគទ្រព្យសម្បត្តិ។
- បោះបង់ការធ្វើហាដ្ឋីចំពោះអ្នកដែលមានលទ្ធភាព។
- និយាយដើមអ្នកដទៃ និងនិន្ទាឈ្នានីសគេ។
- ផឹកស្រា ជក់បារី និងប្រើប្រាស់គ្រឿងញៀន។
- ចេញទៅផ្សារប្រើប្រាស់សម្លៀកបំពាក់ឆើតឆាយដោយមិនមានបងប្អូនទៅជាមួយ។
- អប់រំកូនចៅតាមមនោគមលោកខាងលិច។
- មើលរឿងអាសអាភាសនិងស្តាប់ចម្រៀង។
- អានទស្សនាវដ្តីអាសអាភាស។
- អ្នកបើកបរនិងអ្នកបម្រើចូលទៅក្នុងផ្ទះដោយគ្មាន ការចាំបាច់។
- សេពគប់មិត្តអាក្រក់ និងមនុស្សចង្រៃ។
- ការធ្វេសប្រហែសរបស់ប្តីនិងការប្រព្រឹត្តអំពើអាក្រក់។

នៅមានអំពើអាក្រក់ផ្សេងៗជាច្រើនទៀត។ ក៏ប៉ុន្តែ យើងត្រូវកោតខ្លាចចំពោះអល់ឡោះ និងអនុវត្តតាមបទបញ្ជារបស់ទ្រង់តាមលទ្ធភាពដែលអាចធ្វើបាន ដូចអល់ឡោះទ្រង់បានមានព្រះបន្ទូលថា៖

﴿ يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ قُوٓاْ أَنفُسَكُمۡ وَأَهۡلِيكُمۡ نَارًا ﴾ التحريم: ٦

មានន័យថា៖ «ឱពួកអ្នកដែលមានជំនឿទាំងឡាយ! ចូរពួកអ្នកការពារខ្លួនរបស់ពួកអ្នកនិងក្រុមគ្រួសាររបស់ពួកអ្នកពីភ្លើងនរក»។

## ការអប់រំកូន

ក្នុងចំណោមប្រការសំខាន់ ដើម្បីទទួលបាននូវការពេញចិត្តពីប្តីគឺការអប់រំកូនចៅតាមប្រព័ន្ធអប់រំឥស្លាមដ៏ត្រឹមត្រូវ ហើយនោះគឺជាការបណ្តុះសេចក្តីស្រលាញ់ចំពោះអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់នៅក្នុងខ្លួនរបស់ពួកគេ និងបណ្តុះឱ្យពួកគេមានគោលជំនឿដ៏ត្រឹមត្រូវ។

កុមារប្រៀបបាននឹងប្រព័ន្ធរ៉ាដាដែលកំពុងចាប់រាល់អ្វីៗដែលឆ្លងកាត់នៅជុំវិញវា។ បើសិនជាម្តាយរបស់គេជា

មនុស្សស្មោះត្រង់ ទៀងត្រង់ មានក្រមសីលធម៌ល្អប្រពៃ មានចិត្តក្លាហាន បរិសុទ្ធកាយចិត្ត។ កូនរបស់គាត់លូតលាស់ធំឡើងក្នុងរូបភាពជាមនុស្សដែលមានក្រមសីលធម៌ល្អប្រពៃផងដែរ។ ផ្ទុយទៅវិញ បើម្តាយរបស់គេមានចរិតលក្ខណៈផ្ទុយពីលក្ខណៈខាងលើដែលអល់ឡោះពុំបានបង្គាប់ប្រើដូចជាម្តាយជាមនុស្សកុហកបោកប្រាស់ កំសាក អសីលធម៌។ ដូច្នេះកូនរបស់គេលូតលាស់ធំឡើងក្នុងរូបភាពជាមនុស្សកុហកបោកប្រាស់ ខិលខូច អសីលធម៌ និងកំសាកដូចម្តាយគេដែរ។ ពីព្រោះកុមារ ទោះជាកើតមកនិស្ស័យរបស់គេល្អត្រឹមត្រូវ ស្អាតស្អំពីកំណើត តែបើសិនជាគ្មានការណែនាំអប់រំទៅរកផ្លូវល្អ និងគ្មានគំរូល្អត្រឹមត្រូវសម្រាប់គេទេនោះច្បាស់ណាស់ គេនឹងងាកទៅរកភាពអវិជ្ជមានដោយបុគ្គលិកលក្ខណៈរបស់គេផ្ទាល់តែម្តង។ ត្រូវនឹងសម្តីរបស់ណាពីគាត់មិនដែលនិយាយតាមទំនើងចិត្តរបស់គាត់ ដូចគាត់បានមានប្រសាសន៍ថា៖

عن أبي هريرة رضي الله عنه قال : قال النبي صلى الله عليه وسلم :

( كل مولود يولد على الفطرة فأبواه يهودانه أو ينصراه أو يمجسانه )

صحيح البخاري.

មានន័យថាៈ «កុមារទាំងឡាយកើតមកក្នុងនិស្ស័យស្អាតស្អំពីកំណើត តែឪពុកម្ដាយរបស់គេធ្វើឱ្យគេក្លាយគេជាជ្វីហ្វ ឬគ្រិស្ទាន និងក្លាយជាអ្នកគោរពភ្លើង»។

## គោលការណ៍សំខាន់ក្នុងការអប់រំកុមារ

ទាំងនេះជាគោលការណ៍សំខាន់ក្នុងការអប់រំកុមារតាមប្រព័ន្ធអប់រំសាសនាឥស្លាមៈ

1. បង្រៀនសូត្រគម្ពីរអាល់គួរអាន ក្បួនច្បាប់សាសនាប្រវត្តិណាពី និងពួកអ្នកសទ្បេះ។
2. ទម្លាប់ឱ្យចេះគោរពឪពុកម្ដាយ និងលើកតម្កើងលោកទាំងពីរ គោរពនិងលើកតម្កើងគ្រូបង្រៀន និងអ្នកដែលមានអាយុច្រើនជាង។
3. ការពារកូនៗមិនឱ្យសេពគប់ជាមួយមិត្តអាក្រក់។ ពីព្រោះទម្លាប់និងអាកប្បកិរិយាអាចរៀនពីគ្នាទៅវិញទៅមកដោយការធ្វើត្រាប់តាមគ្នា។

4.នៅពេលដែលកុមារធ្វើអំពើល្អចាំបាច់ត្រូវសរសើរគេដោយបើកចំហ។ តែបើកុមារនោះធ្វើខុសត្រូវប្រដៅគេដោយស្ងាត់ៗ មិនត្រូវធ្វើឱ្យគេអាប់ឱនកិត្តិយសនៅចំពោះមុខមិត្តភ័ក្តិរបស់គេទេ។ពីព្រោះការទម្លាប់ប្រដៅកូនដោយស្តីបន្ទោសច្រើនបែបនេះ អ្វីឱ្យគេបាក់ស្មារតី ល្ងីល្ងើ។ ត្រូវទម្លាប់ឱ្យគេចេះឱនលំទោននិងបោះបង់ភាពក្រអឺតក្រទមអួតអាង។

5. ទម្លាប់ឱ្យគេចេះអត់ធ្មត់ ស៊ូទ្រាំ មិនត្រូវយំនៅពេលត្រូវគេវាយ មិនត្រូវឱ្យគេអាងគេចវេស និងស្រែកឡូឡា។

6.កុំទម្លាប់កុមារឱ្យស៊ីស្រណុក និងដេកស្រួល ត្រូវឱ្យគេចេះសន្សំសំចៃក្នុងការហូបចុក។

7.ហាមឃាត់មិនឱ្យគេជេរអ្នកដទៃនិងនិយាយពាក្យឥតបានការ។

8.បន្ទាចគេពីការប្រព្រឹត្តអំពើអាក្រក់ដូចជាលួច កុហកបោកប្រាស់ អំពើអាក្រក់ និងការរកស៊ីខុសច្បាប់។

៩.អនុញ្ញាតឱ្យកូនរត់លេង និងសម្រាកក្រោយពេលអានសៀវភៅរួចរាល់។ បង្រៀនឱ្យគេចូលចិត្តលេងកីឡាដែលមិនធ្វើឱ្យគេភ្លេចបំពេញកាតព្វកិច្ចរបស់គេទាំងផ្នែកសាសនានិងផ្នែកការរស់នៅក្នុងលោកីយ៍នេះ។

10. ចាំបាច់ត្រូវយកចិត្តទុកដាក់ចំពោះការអប់រំកុមារ ចាប់តាំងពីថ្ងៃដំបូងនៃជីវិតរបស់គេ ដោយសារខ្លួនរបស់គេស្អាតសដូចក្រដាស។ ដូច្នេះ រាល់អ្វីដែលចារឹកលើខ្លួនរបស់គេសុទ្ធតែបន្សល់នូវស្លាកស្នាម។ ដូច្នេះ មេដោះកុមារនោះចាំបាច់ត្រូវតែជាស្ត្រីគ្រប់លក្ខណ៍ត្រឹមត្រូវ និងគោរពប្រតិបត្តិសាសនា។

សូមអល់ឡោះជាម្ចាស់ទ្រង់មេត្តាប្រទានដល់យើងនូវគ្រួសារដែលល្អត្រឹមត្រូវចេះណែនាំនិងទូន្មានប្រៀនប្រដៅគ្នា ...អាមីន។

# ការទូន្មានដ៏ស្មោះស

បងប្អូនស្ត្រីជាទីរាប់អានៈ អល់ឡោះបានលើកតម្កើងស្ត្រីដោយសាសនាឥស្លាម ទ្រង់បានចង្អុលបង្ហាញចិត្តរបស់អ្នកឱ្យមានជំនឿចំពោះទ្រង់ ហើយទ្រង់បានផ្តល់ជូនអ្នកនូវសិទ្ធិ និងកាតព្វកិច្ច ដែលស្ត្រីប្រជាជាតិដទៃឬសម័យកាលផ្សេងមិនធ្លាប់បានទទួលដូច្នេះឡើយ។ សិទ្ធិ និងកាតព្វកិច្ចដែលគ្មានអ្វីប្រៀបផ្ទឹមបាននៅលើលោកនេះ។ ផ្តល់ជូនអ្នកនូវសិទ្ធិពេញលេញទាក់ទងនឹងការមានឥស្សរភាពចំពោះសាសនារបស់អ្នក និងប្រកាន់ខ្ជាប់តាមពាក្យទូន្មានអប់រំរបស់សាសនាដែលជាផ្លូវនាំទៅរកសុភមង្គលនៅក្នុងលោកីយ៍នេះនិងនៅថ្ងៃបរលោក។ លើសពីនេះ អ្នកមានលទ្ធភាពពេញលេញក្នុងការ ស្គាល់ពីអ្វីដែលសាសនានេះផ្តល់ជូនអ្នកនូវលក្ខណៈពិសេសជាច្រើន។ អ្នកចាំបាច់ត្រូវតែសិក្សាស្រាវជ្រាវឱ្យបានស៊ីជម្រៅពីពាក្យទូន្មានប្រៀនប្រដៅរបស់ឥស្លាម។ ដើម្បីឱ្យអ្នកមានទស្សនវិស័យទូលំទូលាយ ច្បាស់លាស់ មានជំនឿជឿជាក់យ៉ាងពេញលេញថា សាសនានេះពិតជាបានផ្តល់ជូនអ្នកនូវអ្វីគ្រប់យ៉ាងនោះ ទើបអ្នកយល់

យ៉ាងច្បាស់ថា រាល់សកម្មភាពរបស់ស្ត្រីឥស្លាមមួយចំនួនដែលទទួលឥទ្ធិពលពីលោកខាងលិចមកប្រកាសទាមទារសិទ្ធិស្ត្រី នេះគ្រាន់តែជាការជំរុញមួយដែលគ្មានការសិក្សាស្រាវជ្រាវទុកជាមុនពីក្រោយការទាមទារដែលគ្មានពាក់ព័ន្ធអ្វីនឹងស្ថានភាពស្ត្រីដែលនៅក្រោមម្លប់ឥស្លាម។

បងប្អូនស្ត្រីឥស្លាមជាទីគោរព៖ អ្នកកំពុងរស់នៅក្រោមម្លប់សាសនាឥស្លាមដែលគ្របដណ្តប់លើគ្រប់វិស័យទាំងអស់នៃជីវិតដ៏ថ្លៃថ្នូរ ថ្កុំថ្កើង។ គ្របដណ្តប់ដោយក្តីជំនឿចំពោះអល់ឡោះ និងគោលការណ៍ឥស្លាមជាសាសនាចុងក្រោយបង្អស់។ រក្សាការពារអ្នកដោយការយកចិត្តទុកគ្រប់ជ្រុងទាំងអស់គ្មានខ្វះចន្លោះត្រង់ណាឡើយ។ ឋិតក្រោមម្លប់សាសនានេះ អ្នកចាំបាច់ត្រូវតែមានបុគ្គលិកលក្ខណៈពិសេសជាងស្ត្រីផ្សេងទៀតដែលមិនមែនជាមូស្លីម។ តាមរយៈការកាន់ខ្ជាប់របស់អ្នកចំពោះបទបញ្ញារបស់អល់ឡោះដែលបង្ហាញនូវរូបភាពថ្លៃថ្លាត្រចះត្រចង់ខុសពីស្ត្រីមិនមែនឥស្លាម និងតាមរយៈក្រមសីលធម៌ដ៏ល្អប្រពៃរបស់អ្នកដែលជាគំរូដ៏ល្អឥតខ្ចោះសម្រាប់ស្ត្រីទាំងឡាយដូចជា ភាពបរិសុទ្ធកាយចិត្ត

ស្អាតស្អំ មានកិត្តិយសកេរ្តិ៍ឈ្មោះថ្កុំថ្កើង។ នៅពេលអ្នកប្រតិបត្តិបានខ្ជាប់ខ្ជួនបែបនេះ គឺអ្នកបានផ្តល់នូវផ្លែផ្កាដ៏ត្រឹមត្រូវដែលឥស្លាមចង់បានសម្រាប់ស្ត្រីធ្វើយ៉ាងម៉េចឱ្យមានក្រមសីលធម៌ខ្ពង់ខ្ពស់ កិត្តិយសស្អាតស្អំ និងបញ្ញាវាងវៃ។

បងប្អូនស្ត្រីដែលមានជំនឿចំពោះអល់ឡោះម្ចាស់តែមួយៈ ចូរកុំភ្លើតភ្លើនចាញ់បោកភ្លើងពណ៌របស់លោកីយ៍ និងភ្លេចគិតពីភាពអវសាននៃជីវិត។ ចូរកុំសោត់អណ្តែតតាមពីក្រោយប្រពៃណីទំនៀមទម្លាប់ និងវប្បធម៌បរទេស ព្រោះវានឹងនាំអ្នកទៅរកផ្លូវដែលអ្នកមិនត្រូវការ។ ចូរស្គាល់ឱ្យច្បាស់នូវប្រការដែលមានប្រយោជន៍និងប្រការដែលគ្មានប្រយោជន៍សម្រាប់អ្នក។ ចូរវាយតម្លៃឱ្យបានច្បាស់គ្រប់ជ្រុងជ្រោយចំពោះកិច្ចការរបស់អ្នក។ ចូររៀនពីបទពិសោធរបស់ស្ត្រីដែលមិនឱ្យតម្លៃខ្លួនឯង និងក្រមសីលធម៌របស់នាង។ ពិតណាស់ អល់ឡោះអាចបំភ្លឺបញ្ញាស្មារតីរបស់អ្នកដោយសាសនាឥស្លាម ចូរប្រុងប្រយ័ត្នឱ្យមែនទែន កុំទៅសេពគប់ជាមួយស្ត្រីដែលគ្មានចំណងនៃសេចក្តីជំនឿ និងក្រមសីលធម៌។ អ្នកត្រូវតែមានជំនឿជឿជាក់ថា រាល់ពេលដែលអ្នក

ប្រកាន់ខ្ជាប់នឹងក្បួនច្បាប់សាសនាឥស្លាម គឺអ្នកស្ថិតនៅលើផ្លូវពិត ហើយអ្នកដទៃស្ថិតនៅលើផ្លូវខុស។ ចូរអត់ធ្មត់នៅពេលអ្នកប្រឈមនឹងការរិះគន់ពីសំណាក់ពួកអ្នកដែលមានចិត្តប្រាសចាកពីផ្លូវត្រូវ។ ដរាបណានៅតែមានមេឃមានដី ដរាបនោះនៅតែមានជម្លោះរវាងផ្លូវត្រូវ និងផ្លូវខុស រវាងល្អនិងអាក្រក់ រវាងក្រុមមនុស្សល្អនិងមនុស្សអាក្រក់។

បងប្អូនស្ត្រីរួមជំនឿតែមួយ៖ ដោយភាពខ្ជាប់ខ្ជួនរបស់អ្នកក្នុងការប្រតិបត្តិសាសនា និងការផ្តល់ជំបូន្មានល្អរបស់អ្នកគឺអ្នកអាចបណ្តុះនូវជំនាន់មនុស្សដែលល្អប្រសើរសម្រាប់សង្គម ស្គាល់និងយល់ដឹងពីកាតព្វកិច្ចរបស់ខ្លួនចំពោះអល់ឡោះ។ ស្គាល់ពីតួនាទីរបស់ខ្លួនដែលមានប្រយោជន៍សម្រាប់សង្គមដែលខ្លួនគេកំពុងរស់នៅ។ មានតែអ្នកតែមួយគត់ដែលអាចបង្កើតផ្ទះរបស់អ្នកឱ្យក្លាយជាសាលារៀន ដែលកូនៗរបស់អ្នករៀន និងទទួលការអប់រំនូវអ្វីៗដែលល្អប្រសើរ និងត្រឹមត្រូវ។ ចូរយកចិត្តទុកដាក់ក្នុងការអប់រំបណ្តុះបណ្តាលជំនាន់ក្រោយរបស់អ្នកលើមូលដ្ឋានគ្រឹះដែលរឹងមាំពោរពេញដោយឧត្តមភាព និងក្រមសីលធម៌ល្អ។ ចូរប្រុង

ប្រយ័ត្នកុំឱ្យប្រគល់កូនរបស់អ្នកទៅអ្នកអប់រំដែលមិនមែនជាអ្នកមូស្លីម ឬឱ្យគេចូលរៀននៅសាលាដែលមិនមែនជាសាលាឥស្លាម។ នេះមានន័យថា អ្នកកំពុងតែចូលរួមចំណែកដោយចេតនាឬអចេតនា ក្នុងការអប់រំកូនទៅរកសាសនាដែលមិនមែនជាសាសនារបស់គេ និងគោលជំនឿដែលមិនមែនជាគោលជំនឿរបស់គេ។ សូមឱ្យអ្នកជៀសវាងកុំឱ្យខ្លួនអ្នកក្លាយជាមូលហេតុដែលធ្វើឱ្យកូនរបស់អ្នក ងាកចេញពីសាសនារបស់អល់ឡោះ ដែលទ្រង់មិនទទួលស្គាល់សាសនាផ្សេងក្រៅពីឥស្លាមនេះឡើយ។ ចូរជឿទុកចិត្តចុះថា រាល់ក្តីស្រមៃទាំងអស់ដែលកំពុងមកប្រលែងលេងជាមួយអ្នក ហើយអ្នកយកកូនៗដ៏មានតម្លៃរបស់អ្នកប្រគល់ឱ្យសត្រូវរបស់អ្នកដើម្បីឱ្យពួកគេគ្រប់គ្រងលើការបង្ហាត់បង្រៀន និងអប់រំពួកគេនោះ នៅទីបំផុតគ្មានទទួលផលអ្វីក្រៅពីកូនៗរបស់អ្នកក្លាយជាមនុស្សដែលប្រកាន់នូវគំនិតទស្សនៈដែលគ្មានចំណងទាក់ទងអ្វីជាមួយអ្នក និងជាមួយឪពុករបស់ពួកគេ ហើយគ្មានពាក់ព័ន្ធអ្វីនឹងជំនឿជឿរបស់ពួកគេ។ ផ្ទុយទៅវិញ ពួកគេប្តូរតាមគំនិតដែលអ្នកគ្រប់គ្រងរបស់ពួក

គេបានបង្ហាត់បង្រៀននិងអប់រំពួកគេ។ បញ្ហាដែលគ្រោះថ្នាក់បំផុតគឺមានបុគ្គល ឬសមាគមដែលមិនមែនឥស្លាមមកអប់រំកូនៗរបស់អ្នកឥស្លាមតាមគោលការណ៍ឥស្លាមដោយអ្នកពុំបានចាប់អារម្មណ៍។

បងប្អូនស្ត្រីមូស្លីម! យោងតាមគោលការណ៍ «មិនទាន់មានជំនឿពេញលេញទេ លុះត្រាតែគេស្រលាញ់បងប្អូនរបស់គេដូចដែលគេស្រលាញ់ខ្លួនរបស់គេ»។ ខ្ញុំសង្ឃឹមថាមាតាទាំងឡាយប្រកាន់ខ្ជាប់ជានិច្ចនូវគ្រប់ភារកិច្ចជីវិតដោយអនុវត្តតាមបទបញ្ញារបស់អល់ឡោះ។ ត្រូវជៀសវាងពីទង្វើទាំងឡាយដែលអល់ឡោះទ្រង់ក្រោធខឹង ទោះដោយពាក្យសម្ដីនិងកាយវិការ។ ពីព្រោះទាំងអស់នេះ ជាផ្លូវសុភមង្គលរបស់ពួកអ្នក។ អល់ឡោះទ្រង់អាណិតស្រលាញ់ចំពោះបុគ្គលដែលនិយាយពាក្យល្អៗ គេទទួលផលបុណ្យ ឬគេនៅស្ងៀមមិននិយាយពាក្យអាក្រក់ ហើយគេបានសេចក្ដីសុខសុវត្ថិភាព។

## តើធ្វើដូចម្ដេចដើម្បីឱ្យប្ដីពេញចិត្ត?

សំនួរនេះហាក់ដូចជាធ្វើឱ្យអ្នកស្តាប់ច្រឡំថាចង់សួរពីរឿងអ្វីមួយ។ ខ្ញុំរីករាយនឹងសរសេរសង្ខេប ហើយបញ្ចប់សារនេះដោយពាក្យថា៖ «ស្ត្រីដែលប្រតិបត្តិសាសនាខ្ជាប់ខ្ជួនតាមក្បួនច្បាប់សាសនាឥស្លាមនោះ នឹងស្គាល់ពីរបៀបដែលធ្វើដូចម្តេចដើម្បីឱ្យប្ដីស្រលាញ់ពេញចិត្ត»។

មូលហេតុសំខាន់ៗដែលធ្វើឱ្យប្ដីពេញចិត្តគឺមានដូចខាងក្រោម៖

1. គោរពប្រតិបត្តិចំពោះអល់ឡោះតាមអ្វីដែលទ្រង់បានបង្គាប់ប្រើ។
2. បោះបង់ចោលនូវអំពើអាក្រក់។
3. គោរពប្រតិបត្តិចំពោះប្ដី បង្កើតភាពស្និទ្ធស្នាល និងទន់ភ្លន់ចំពោះប្ដី។
4. សម្អាតផ្ទះសម្បែង និងរៀបចំផ្ទះ។
5. អប់រំកូនៗតាមប្រព័ន្ធអប់រំសាសនាឥស្លាម។
6. គោរពសក្ការៈចំពោះអល់ឡោះ និងបូជាខ្លួនចំពោះអល់ឡោះដោយខិតខំបម្រើប្ដី និងគោរពប្រតិបត្តិបចំពោះប្ដី។

7.ទទួលរាក់ទាក់ប្តីដោយភាពញញឹម និងរៀបចំបរិយាកាសសមរម្យសម្រាប់ប្តីដើម្បីបំបាត់ភាពនឿយហត់។

8.ផ្តល់សេចក្តីស្រលាញ់និងការគោរពលើកតម្កើងចំពោះប្តី។

9.យកចិត្តទុកដាក់ចំពោះសាច់ញាតិខាងប្តី គោរពលើកតម្កើងចំពោះពួកគេជាពិសេស ឪពុកម្តាយ និងបងប្អូនរបស់ប្តី។

10. មានអាកប្បកិរិយាល្អចំពោះប្តី នេះជាមូលហេតុដ៏សំខាន់ក្នុងការទាក់ទាញចិត្តប្តី ពីព្រោះសីលធម៌ជាសោភ័ណភាពពិត។ គួរឱ្យសោកស្តាយ អ្នកឃើញស្ត្រីម្នាក់គេហៅថាស្ត្រីដែលប្រកាន់ក្បួច្បាប់សាសនាខ្ជាប់ខ្ជួនមានកម្រិតវប្បធម៌ខ្ពង់ខ្ពស់ តែបែរជាមិនស្គាល់អ្វីសោះពីក្រមសីលធម៌។ គេនិយាយខ្លាំងៗជាមួយប្តីធ្វើមុខក្រញូវដាក់មនុស្សចាស់ គិតថា គាត់ជាមនុស្សចាស់ជរា ចាស់គំរិល អាត្មានិយម!។ តាមទស្សនៈយល់ឃើញរបស់មនុស្សទូទៅ តើស្ត្រីបែបនេះសក្តិសមជាស្ត្រីដែលប្រកាន់ខ្ជាប់នឹងសាសនាដែរឬទេ? ព្រះជា

ម្ចាស់ដ៏មហាថ្កុំថ្កើងទ្រង់បានជម្រុញឱ្យយើងមានសីលធម៌ល្អ និងសម្តែងអាកប្បិរិយាទន់ភ្លន់ចំពោះមនុស្សទូទៅ។ ដូចទ្រង់បានមានព្រះបន្ទូលថា៖

﴿وَٱلۡكَٰظِمِينَ ٱلۡغَيۡظَ وَٱلۡعَافِينَ عَنِ ٱلنَّاسِ﴾ آل عمران: ١٣٤

មានន័យថា៖ «ពួកអ្នកដែលអត់ធ្មត់ទប់កំហឹងរបស់គេ ហើយនៅពេលពួកគេមានលទ្ធភាពគឺពួកគេអធ្យាស្រ័យចំពោះអំពើអគតិពាលារបស់មនុស្សទូទៅ»។

ណាពីមូហាំម៉ាត់បានជម្រុញលើកទឹកចិត្តចំពោះការប្រកាន់នូវសីលធម៌ល្អ និងទឹកមុខញញឹមរាក់ទាក់។ គាត់បានមានប្រសាសន៍ថា៖ «អំពើល្អគឺជាសីលធម៌ល្អ» (រីវ៉ាយ៉ាត់មូស្លីម)។ គាត់បានមានប្រសាសន៍ទៀតថា៖ «របស់ដែលធ្ងន់ជាងគេក្នុងជញ្ជីងអ្នកជំនឿនោះគឺសីលធម៌ល្អ។ អល់ឡោះក្រោធខឹងចំពោះមនុស្សអាសគ្រាមថោកទាប» (សហះអាល់យើមៀក صحيح الجامع )។

សូមអល់ឡោះទ្រង់មេត្តាប្រទានពរជ័យសេរីសួស្តី និងសេចក្តីសុខសន្តិភាពកើតមានដល់ណាពីមូហាំម៉ាត់ សាច់ញាតិ

និងសហការីរបស់គាត់ទាំងអស់គ្នា ។ សូមអរព្រះគុណ ចំពោះអស់ទ្បោះម្ចាស់នៃសកលលោក។

## ខ្លឹមសារទូទៅ

សាសនាឥស្លាមបានផ្តល់សិទ្ធិ និងកាតព្វកិច្ចដល់ស្ត្រី។ កាតព្វកិច្ចដ៏ធំបំផុតគឺសិទ្ធិរបស់ប្តីដែលជាឋានសួគ៌ឬជាឋាននរករបស់នាង។ បានសេចក្តីថា សិទ្ធិរបស់ប្តីជាមូលហេតុដែលអាចធ្វើឱ្យស្ត្រីចូលឋានសួគ៌ឬចុះនរក។

អ្នកនាំសាររបស់អល់ឡោះបានមានប្រសាសន៍ថា៖ «កាលណាស្ត្រីថ្វាយបង្គំទាំងប្រាំពេល បួសខែរ៉ម៉ាហ្ទន ការពារភាពបរិសុទ្ធកាយចិត្ត គោរពប្តី គឺនាងអាចចូលឋានសួគ៌តាមទ្វារណាមួយដែលនាងពេញចិត្ត»។ (សហេះសៀខអាល់ហ្កានីយ៍)។

ប្រពន្ធគ្រប់លក្ខណ៍គឺជាសុភមង្គលលោកីយ៍ ហើយនាងជាអ្នកជួយគាំទ្រប្តីក្នុងការគោរពប្រតិបត្តិចំពោះអល់ឡោះ ផ្តល់សេចក្តីសុខ ភាពសុខដុមរមនាយ៉ាងពេញលេញដល់ប្តីសម្រាប់គ្រប់កិច្ចការទាំងអស់។

# كيف تسعدين زوجك ؟



الرحمة العالمية
RAHMA INTERNATIONAL
جمعية الإصلاح الاجتماعي
مكتب كمبوديا

إعداد وترجمة:

لجنة الترجمة

بجمعية الإصلاح الاجتماعي - الكويت

بالتعاون مع

جمعية البركة الخيرية بمملكة كمبوديا




រៀបចំដោយៈ

គណៈកម្មការបកប្រែ និងបោះពុម្ពសៀវភៅនៃ

សមាគមសម្របសម្រួលសង្គមនៃប្រទេសកូវ៉ែត

សហការជាមួយ

សមាគមសប្បុរសធម៌ដើម្បីអភិវឌ្ឍន៍កម្ពុជា